សរ . សារុន

# វប្បធម៌ និង

# អរិយធម៌ខ្មែរ

ភាគ 2

សម្រាប់ថ្នាក់ទីបញ្ចប់

ថ្នាក់ត្រៀមនៃឧត្តមសិក្សា



បណ្ណាគារ ពន្លឺខត្យា

សរ សារុន

សាស្ត្រាចារ្យ មហាវិទ្យាល័យអក្សរសាស្ត្រ

# វប្បធម៌ និង អរិយធម៌ខ្មែរ

(អធិប្បាយ បែបទស្សនវិជ្ជា)

## ភាគ ទី ២

# Classe de Philosophie et de Propédeutique

មានផ្ញើលក់ដុំ-លក់រាយ

នៅបណ្ណាគារ "ពន្លឺវិទ្យា" លេខ ៥៨ "ខ"

ផ្ទះលេខ ៣២៩ (ផ្សារដើមអំពិល) ទំងវិទ្យាល័យ

ឯកជន ខេមរវិជ្ជា ភ្នំពេញ

# ៥– អំពីភវនិយម

## l' Existentialisme

រួចមកហើយ យើងបានអធិប្បាយអំពីវគ្គន៍ នៃ ទស្សនៈទាំងឡាយ របស់ទស្សនវិទូ ដែលមាន នៅក្នុង ទស្សនវិជ្ជា ៖

– រូបនិយម ( ឲ្យតម្លៃលើរូប )

– មនោនិយម ( ឲ្យតម្លៃលើមនោ )

– ពិសោធន៍និយម ( ឲ្យតម្លៃលើពិសោធន៍ )

– វិចារណនិយម ( ឲ្យតម្លៃលើវិចារណៈ )

ទស្សនៈដែលប្រឆាំង នឹងវិចារណនិយម គឺទស្សនៈ សហជញ្ញាណនិយមរបស់លោកប៊ែរសុន ប៉ុន្តែលោកប៊ែរ សុន ពុំបានអធិប្បាយឲ្យបានច្បាស់លាស់ ដែលទាក់ទង ទៅនឹងជីវភាពរស់នៅពិត ៗ របស់មនុស្ស ព្រោះដូចកាល ទស្សនៈសហជញ្ញាណនិយម បានទទួលការរិះគន់ យ៉ាង ច្រើន ។

លោក Kierkegaard ដែលជាអ្នកប្រឆាំងនឹង ទស្ស វិជ្ជា វិចារណនិយមនោះបានយល់ថា ទស្សនវិជ្ជាប្រមូលមកហើយ . ទោះបីជារូបនិយមក្តី មនោនិយមក្តី ពិសោធន៍និយមក្តី វិចារណនិយមក្តី ពុំបានយល់បញ្ហាពិតប្រាកដរបស់សង្គមមនុស្ស ឬ ស្ថានភាពជាក់ស្តែងរបស់មនុស្ស ពោលគឺភាវៈរបស់មនុស្ស (l' existence humaine) ដើម្បីយល់នូវសេចក្តីត្រូវការរបស់មនុស្សពិតៗ យល់នូវបំណងរបស់មនុស្ស ហើយមនុស្ស អាចរកសុខៈបានឬទេ ក្នុងនាទីខ្លួនជាមនុស្ស ក្នុងពេលវេលា និងកាលអាកាសដែលខ្លួនរស់នៅ ?

ទស្សនវិជ្ជាប្រមូលមកហើយ ច្រើនឡើងតម្លៃលើទស្សនៈនីមួយៗ ខ្ពង់ខ្ពស់ពេក ទោះបីជាទស្សនៈប្រសើរក្តី ពុំប្រសើរក្តី ហើយពុំបានយកចិត្តទុកដាក់ នឹងជីវភាពជាក់ស្តែងរបស់មនុស្ស ដោយពុំបានចោទសួរថា ៖

-- តើមនុស្ស ដែលពុំមែនជាអាទិទេព អាចធ្វើអំពើ

នេះបានឬទេ ?

– តើកន្លែងពេលវេលានេះ កាលកាកាសនេះ មជ្ឈដ្ឋាននេះ មនុស្សអាចធ្វើអំពើនេះបានឬទេ ក្នុងនាទីខ្លួនជាមនុស្ស ?

សំណួរទាំងឡាយ ខាងលើនេះ បានធ្វើឲ្យលោក Kierkegaard យល់តម្លៃជីវភាពជាក់ស្តែង របស់មនុស្ស ហើយចំរកផ្លូវដោះស្រាយឲ្យមនុស្ស អាចសម្រេចបាននូវសុខៈ តាមសមត្ថភាព លទ្ធភាព និងពេលវេលាដែលខ្លួនរស់នៅ ៗ នេះហើយជាដើមកំណើតនៃទស្សនវិជ្ជា កវនិយម ( Ce qui est plus réel ce sont les situations humaines, les existences. Il n'y a pas d'essences qui représentent la Réalité authentique; la seule réalité est la réalité vécue, celle des existences. )

មានទស្សនៈច្រើនយ៉ាង យល់អំពីកវនិយម ៖

**ក /- ទស្សនៈភវបាតុភូតនិយម**

( l' Existentialisme phénoménisté )

គឺជាទស្សនៈរបស់លោកហ៊ុស្សែល ( Husserl )ដែលមានបំណងស្វែងរកភាពជាក់ស្តែង ក្នុងបណ្តាបាតុភូតទាំងឡាយ ដែលកើតមានក្នុងជីវភាពរស់នៅ របស់មនុស្ស ហើយៈប្រើមធ្យោបាយតាមលក្ខភាពរបស់មនុស្ស ក្នុងកាលឱកាសដែលមនុស្សរស់នៅ ព្រោះបាតុភូតដែលកើតមានឡើង សុទ្ធតែជាបំណងរបស់មនុស្ស ឆ្ពោះទៅរកភាពជាក់ស្តែង

ខ/- ទស្សនៈ ភអេទេវនិយម

( l' Existentialisme athée )

គឺជាទស្សនៈរបស់លោក Heidegger និងលោកSartre

ទស្សនៈនេះ ពុំស្វែងរកអ្វីដែលជាខ្លឹមសារហួសហេតុពិបាកឲ្យមនុស្សឈបសម្រេចបាននោះទេ ហើយចំដឹកនាំឲ្យមនុស្សពឹងពាក់លើខ្លួនឯង ព្រោះក្នុងភាវៈនេះ មនុស្សពុំចេះជួយមនុស្សទេ ។ គេឃើញតែមនុស្សជិះជាន់មនុស្ស មនុស្សឃោរឃៅ មនុស្សថ្មើមៈខ្ព ចិញ្ចឹមការសេះសឹក

លោភអំណាច ពុករលួយ ខ្ញុំកញ្ជះនៃសភាវគតិរបស់ខ្លួន ហើយមានតែសេចក្ដីស្លាប់ទេ ទើបអាចបំបាត់អំពើទាំងនោះបាន ។ ពុំចាំបាច់ពឹងវត្ថុស័ក្តិសិទ្ធិ នៅលើមេឃទេ នៅលើមេឃ គ្មានអ្វីទាំងអស់ ត្រូវខ្លួនយើងរៀបចំខ្លួនយើងឲ្យមានសេរីភាពឡើង បើគេមិនជួយយើង យើងក៏មិនជួយគេ ៗ ម្នាក់ ៗ ត្រូវស្វែងរកសុភមង្គលតែសព្វខ្លួន ទើបសុភ-មង្គលកើតមានឡើង ។

ក / ទស្សនៈ ភាវ អត្ថិរូបនិយម

( l'Existentialisme transcendant )

គឺជាទស្សនៈរបស់លោក ( Karl Jaspers ) និងលោក ( Gabriel Marcel ) ។

ទស្សនវិទូទាំងពីរនេះបានលើកយកភាវៈ មកពន្យល់ ដោយយោលតាមយោបល់ទស្សនៈវិទូទាំងឡាយពីមុនៗដែរ ប៉ុន្តែបានអធិប្បាយភ្ជាប់ទៅនឹងទស្សនៈថ្មីមួយទៀតដែលមាននិន្នាការទៅរកអត្ថិរូបនិយម ។

ភវៈ ជាអ្វី ? qu'est ce que l'existence ?

ភវៈ សម្គាល់នូវអ្វីដែលមាន អ្វីៗដែលមនុស្សជួបប្រទះតាមការរស់នៅរបស់មនុស្ស តាមទម្លាប់ តាមកាលអាកាស តាមពសុធា ដែលមាននៅក្នុងប្រវត្តិសាស្ត្រ មនុស្សអាចជួបប្រទះ នូវការខាតបង់ ឬ ជួបប្រទះនូវជោគជ័យក្នុងឆាកជីវិត ។

ទស្សនៈ ភវអេទនិយម ច្រើនអប់រំមនុស្សឲ្យពឹងលើសមត្ថភាពរបស់ខ្លួន ។ ធម្មជាតិរបស់មនុស្សអាក្រក់ណាស់ ចូលចិត្តលោភ ចូលចិត្តជិះជាន់អ្នកដទៃ ចូលចិត្តប្រើអំណាចរំលោភលើមនុស្សផងគ្នា ។ ទស្សនៈ ភវអស្តិរូបនិយមពុំបានជំទាស់ទឹងគំនិតនេះទេ ប៉ុន្តែបានបង្ហាញនូវហេតុផល ដែលជាការៈពិតៗរបស់មនុស្សនៅពេលដែលមនុស្សពុំអាចពឹងខ្លួនឯងបានហើយចង់រកទីពឹង អ្វីដែលខ្ពស់ជាងមនុស្ស បានសេចក្តីថាមនុស្សត្រូវតែស្វែងរកអ្វីដែល

ខ្ពស់ជាងមនុស្ស (l'homme et un au-dessus de l'homme; l'homme doit se transcender.)

លោក (Marcel) បានបញ្ជាក់ថា ការដោះស្រាយបញ្ហាមនុស្សដោយលើកយកភាវៈបច្ចុប្បន្នមកធ្វើជាពុទ្ធិវិត្តជាការប្រសើរណាស់ ប៉ុន្តែត្រូវត្រាយផ្លូវទៅខាងមុខទៀត ។ កាលណាគេជួបប្រទះ បញ្ហាទាំងឡាយដែលលេចឡើងគេត្រូវនៅជួយដោះស្រាយគ្នា គេពុំត្រូវបបួលគ្នារត់ទៅនិព្វាន ឬ ចាកលោកនេះទេ គេត្រូវពិចារណារកមើលទំនាក់ទំនងដែលកើតមានរវាងមនុស្ស និងការរស់នៅរបស់មនុស្ស ដើម្បីស្វែងរកមើលត្រង់ណាជាការសង្ឃឹមរបស់មនុស្ស ឬជាមាគ៌ាដែលមនុស្សត្រូវឆ្ពោះទៅរក ។

ឃ / ទស្សនៈ ភាវ មនុស្សនិយម

(l'Existentialisme personnaliste)

ទស្សនៈ នេះបានលើកយកយោបល់ របស់លោក Marcel មកបញ្ជាក់ឲ្យច្បាស់ដើម្បីជាការដោះស្រាយបញ្ហា

មនុស្ស និងគេនិយមដ៏ច្បាស់លាស់នៃពាក្យមនុស្ស ។ លោក Marx បានលើកជាកសនានៃមនុស្សជាតិ គឺការធ្វើឲ្យមនុស្សមានសេរីភាពទៀត ហេតុគឺការជិះជាន់គ្រប់បែបយ៉ាង ។

មានអ្នកប្រាជ្ញជាច្រើននាំទស្សនៈការមនុស្សនិយម ៖

— Lotze
— Max Scheler
— Ruber
— Charles Péguy
— Nicolas Berdiaeff
— Simone Weil
— Laberthonnière
— Maurice Blondel
— Jacques Maritain
— Emmanuel Mounier

ការមនុស្សនិយម គឺជាទស្សនវិជ្ជាស្តីអំពីភាវៈ

(Le personnalisme est une philosophie de l'existence; c'est un Humanisme nouveau . . .)

នៅប្រទេសបារាំង ទស្សនវិទូដែលមានគំនិតនាមល្បីល្បាញជាងគេក្នុងទស្សនវិជ្ជានេះ គឺលោក មូនីយេ ។ លោក

បានសរសេរសៀវភៅឈ្មោះ « Manifeste au service du personnalisme » នៅ គ.ស ១៩៣៦ ។

គេអាចលើកយកគោលសំខាន់ៗ នៃទស្សនវិជ្ជានេះ មកបង្ហាញដូចតទៅ ៖

១/ ទស្សនវិជ្ជានេះពុំទទួលឲ្យមាន ៖

- គំនិត បុគ្គលនិយម ( Individualisme )
- គំនិត អន្យត្ថិរីយនិយម ( Nihilisme )
- គំនិត បក្សពួកនិយម ( Esprit de clan )
- គំនិត ក្រសោបនិយម ( Totalitarisme )
- គំនិត គម្រូវនិយម ( Conformisme )

២/ ទស្សនវិជ្ជានេះទទួលយល់ព្រមឲ្យមាន ៖

- ការភ្ញាក់រលឹករបស់បុគ្គលម្នាក់ៗ ត្រូវទៅស្របគ្នា នឹងការភ្ញាក់រលឹករបស់សង្គម
- សង្គមនីយកម្ម ប្រសើរជាងរដ្ឋនីយកម្ម

៣/ ទស្សនៈភាវនិយមសកម្ម

( L'Existentialisme de l'action)

ទស្សនៈនេះបានគេអធិប្បាយយ៉ាងខ្លីថា តម្លៃរបស់មនុស្សឋិតនៅត្រង់សកម្មភាព ដែលមនុស្សបានធ្វើ ។ បើអំពើពុំស្អាតស្អំមនុស្សដែលបានធ្វើអំពើនោះ ក៏ពុំស្អាតស្អំដែរ និងយោបល់ផ្ទុយទៅវិញ បើអំពើនោះធ្វើឲ្យប្រទេសជាតិជឿនលឿន មនុស្សដែលបានធ្វើអំពើនោះ គឺជាមនុស្សជឿនលឿន ។

នៅសតវត្សទី ២០ នេះ មនុស្សគេពុំយកសំដីទេ មនុស្សគេយកអំពើដែលធ្វើ ។

អំពើអាក្រក់បញ្ជាក់ថាមនុស្សអាក្រក់ អំពើល្អបញ្ជាក់ជាមនុស្សល្អ ។

១- ជនខ្លះអួតអាងថាខ្លួនស្អាតស្អំ ប៉ុន្តែអំពើរបស់ខ្លួនជាអំពើពុករលួយ (តើគួរយកពាក្យសំដីឬ យកអំពើ ?)

ម្រាមសេចក្តីមក ទស្សនវិជ្ជាកនិយមមានន័យច្រើន

បែបយ៉ាងណាស់ ប៉ុន្តែគោលគំនិតធំៗ ដែលទាក់ទងគ្នា គឺការអប់រំឲ្យមនុស្សស្គាល់តម្លៃរបស់មនុស្ស ចៀសវាងការជិះជាន់គ្នាដោយយកជីវភាពបច្ចុប្បន្ន ជាមូលដ្ឋាននៃការដោះស្រាយ គោលគឺដោះស្រាយតាមលទ្ធភាពដែលអាចធ្វើបាន ដោយយោងតាមស្ថានភាពកាលអាកាស មជ្ឈដ្ឋានរស់នៅ ធ្វើយ៉ាងណាឲ្យការដោះស្រាយមានយុត្តិធម៌ អាចរកសុខបានហើយចៀសវាងទុក្ខបានទៀតផង ។

១– ពលរដ្ឋទាំងអស់ត្រូវសិក្សាវិជ្ជា យុទ្ធសាស្ត្រគ្រប់គ្នា ព្រោះជីវភាពបច្ចុប្បន្នតម្រូវឲ្យយើងចេះការពារខ្លួនយើងផង ការពារប្រទេសជាតិផង ។

១– រៀបអាពាហ៍ពិពាហ៍តាមការចុះកាសែត ពុំចំណាយប្រាក់ឥតប្រយោជន៍ ព្រោះជីវភាពបច្ចុប្បន្នពុំតម្រូវឲ្យយើងហ៊ោសប្បាយខ្លាំងពេក ខ្លាចក្រែងមានអសន្តិសុខ ។

១– ខ្មាំងសត្រូវ បានរំលោភលើរូបកាយស្ត្រីខ្មែរជា

ច្រើននាក់ បើយើងជាបុរសមានទស្សនៈករនិយម យើងត្រូវយល់ព្រមរៀបការជាមួយស្ត្រីនោះមុនគេ ដើម្បីកុំឲ្យគ្នាខូចទឹកចិត្ត ព្រមទាំងអប់រំថែមទៀតផង ព្រហ្មចារីយ៍ពុំបញ្ជាក់នូវតម្លៃរបស់មនុស្សទេ ព្រោះវាមានបរិវេណតែមួយនាទីប៉ុណ្ណោះ រួចហើយក៏ដូចគេដូចឯង . . :

សារៈសំខាន់ដែលបងបានគិត ទឹកចិត្តដ៏ស្អាតស្អំនេះវិញទេ ទើបបញ្ជាក់នូវអត្តៈដ៏បរិសុទ្ធ ៗ គួរឲ្យតម្លៃលើបច្ចុប្បន្នកាលជាងអតីតកាល ៗ

នារីរូប ដែលបានទទួលឥទ្ធិពលទស្សនវិជ្ជាករនិយម ក្នុងការរៀបអាពាហ៍ពិពាហ៍គេពុំស្រាវជ្រាវរកអតីតកាលនៃគូទាំងពីរទេ . គេគិតចាប់តាំងពីបច្ចុប្បន្ន នៃថ្ងៃដែលគេបានយល់ព្រមស្រឡាញ់គ្នា - - -

ទាំងអស់នេះ ជាឧទាហរណ៍បញ្ជាក់នូវទស្សន

វិជ្ជាករនិយម ។

កុំច្រឡំទស្សនវិជ្ជាករនិយម និង ទស្សនវិជ្ជា ភព-និយម (ne pas confondre l'Existentialisme avec le Réalisme)

---

## ៦ - អំពីគថនិយម

### le Réalisme

គឺជាទស្សនវិជ្ជាមួយផ្នែក ដែលឲ្យតម្លៃទៅលើគូ ជាគថា (le réel) ។

គថៈ ពុំមែនជាការពិតទេ ។ មតិខ្លះ ច្រឡំប្រឡំគថៈ និងសច្ចៈ ( la vérité ) ។ សច្ចៈជាការពិតប្រាកដតាមធម្មជាតិដែលធ្លាប់មានឡើង ។ គថៈមានទិន្នាការទៅរកសច្ចៈ ប៉ុន្តែពុំមែនសច្ចៈទេ ពោលគឺ ជាការពិត ក៏មិនមែន មិនពិតក៏មិនមែន ។ គថៈគឺជាការរៀបចំឡើង ឲ្យដូចជាការពិត ( Réalisaton ) ។

១ - រឿងទុំទាវ ពុំមែនជារឿងពិតទេ ប៉ុន្តែជារឿងគថៈ ដែលគេតែងឡើងឲ្យមានលំនាំ ដូចជារឿងពិត ដោយការភ្ជាប់បញ្ហាសង្គមមនុស្សទៅ និងជំនឿសាសនា ទំនៀមទម្លាប់ ជីវភាពរស់នៅដែល

អាចកើតឡើងនៅជំនាន់នោះ ដូចជាការ ធ្វើដំណើរតាមរទេះគោ តាមទូក កាត់កាលចូលព្រៃ .. និងទំនៀមទម្លាប់ចូលម្លប់ជាដើម ។

- ខ្សែសម្លាប់យៀកកុង គឺជាការពិត ឬសច្ចៈ ( le vrai ) ចំណែកឯខ្សែភាពយន្ត តែងរឿង ខ្សែ សម្លាប់យៀកកុងគឺជាតថ: ( le réel ) ។ តាមរយៈខ្សែភាពយន្តនេះ ទស្សនិកជន បាន ឃើញខ្សែសម្លាប់យៀកកុងមែន ប៉ុន្តែ គឺជារឿង ប្រឌិតឲ្យមានលំនាំដូចជារឿងពិត(Film réaliste)

## ៧ - អំពីទេវនិយម

**le Déisme**

ទេវនិយម ជាទស្សនវិជ្ជាមួយផ្នែក ដែលលើកយក និង ដោះស្រាយអំពីបញ្ហាអាទិទេព ដោយសួរថា តើព្រះអាទិទេពមានឬពុំមាន ?

បញ្ហានេះ បានចោទឡើង ជាយូរយារណាស់មក ហើយ ហើយជាបញ្ហា ដែលទាក់ទង និង សាសនា ទៀតផង ។

មានទស្សនៈច្រើន ដែលយល់និងពន្យល់អំពីបញ្ហាអាទិទេព

– ក្នុងព្រះពុទ្ធសាសនា គេជឿថា ពុំមានព្រះអាទិទេពទេ ។ បញ្ហាអាទិទេព ជាបញ្ហាទាក់ទង និងបញ្ហាភាវៈ និង លោកៈ បានសេចក្តីថា បញ្ហាអាទិទេព បានកើតឡើងនៅពេលស្រាវជ្រាវរកកំណើតភាវៈ លោកៈនេះ ឯង ។ ការយល់ និងពន្យល់អំពីកំណើតភាវៈលោកៈ

មានលក្ខណៈច្រើនយ៉ាង ៗ

ព្រះពុទ្ធសាសនា ពន្យល់ថាកំណើតភូតទាំងអស់ កើតមកអំពីសំខតធាតុ ដែលជាការផ្សំរវាងធាតុទាំង ៤ គឺទឹក ដី ភ្លើង ខ្យល់ ៗ ដោយមានជំនឿ បែបនេះ បញ្ហាអាទិទេព ពុំមានចោទឡើងទេ ក្នុងព្រះពុទ្ធសាសនា ៗ កុំច្រឡំអាទិទេព និងទេវតា ៗ ក្នុងព្រះពុទ្ធសាសនា ទេវតាជាតួអង្គ តំណាងអំពើល្អ តែពុំមែនជាអ្នកបង្កើតលោកៈ និងភាវៈទេ ចំណែកឯក្នុងសាសនាដទៃទៀត អាទិទេព គឺជាតួអង្គល្អប្រសើរបំផុតក្នុងលោក ៗ

- លោកប្លាតុង ( Platon ) យល់ថា ព្រះអាទិទេពគ្រាន់តែជាអស្តិមតិ ឬជាមតិដ៏ល្អ ៗ ដ៏ខ្ពង់ខ្ពស់ ផ្តល់មកលោកៈ និងភាវៈ ៗ
- លោកអារីស្តូត (Aristote) យល់ថា ព្រះអាទិទេព មានឧត្តមភាពពិតប្រាកដ ហើយជាអ្នកបង្កើតលោកៈ

និងការ: ប៉ុន្តែព្រះអាទិទេពជាតួអង្គកើតឯង ពុំមាននរណាបង្កើតព្រះអង្គទេ ។ គេបានចាត់ទុកថា ព្រះអាទិទេព ជាតួអង្គបរិសុទ្ធ ដែលបានផ្តល់តម្លៃដ៏ខ្ពង់ខ្ពស់មកលើលោក: និងការ: ។

- លោក អេពីគារ (Epicure) ជឿថា មានព្រះអាទិទេពដែរ ប៉ុន្តែព្រះអាទិទេពពុំមានរូបរាងទេ គឺអ្វី ១ ដែលឋិតនៅក្នុងមនោ ឲ្យគេស្រមៃឃើញថា អាចជួយបន្ធូរទុក្ខសោកមនុស្សលោក ឬជាពន្លឺមួយ (Illumination) ដឹកនាំឲ្យគេដើរឆ្ពោះទៅរកផ្លូវល្អ ប៉ុន្តែផ្លូវល្អគឺ ផ្លូវណាក្រក់ក្តី មនុស្សអាចជួបប្រទះ ក្នុងសង្គមមនុស្ស ឬក្នុងមនុស្សធម្មជាតិ (la nature humaine) ការធ្វើឲ្យខ្លួនឯង ឬអ្នកដទៃបានរីករាយ គឺជាអំពើបុណ្យ រីឯការឈឺចាប់គ្រប់បែបយ៉ាង គឺជាអំពើបាបដូចេះការសម្រេចតាមធម្មជាតិរបស់មនុស្ស គឺជាការរកឃើញនូវសេចក្តីរីករាយ ( Suivre la nature c'est

chercher son plaisir ) ប៉ុន្តែ ក្នុងករណីខ្លះ ការរក ·ពាយ ពុំមែនល្អទាំងអស់ទេ ឯការឈឺចាប់ ក៏ពុំអាក្រក់ទាំងអស់ដែរ ការឈឺចាប់ខ្លះ អាចធ្វើឱ្យគេរកឃើញនូវសុខ: ដូច្នេះយើងត្រូវយកចិត្តទុកដាក់ លើផលវិបាក ដែលកើតមកអំពីផលល្អ និង អាក្រក់ ដែលមានក្នុងសង្គមមនុស្ស ( Tout plaisir n' est-pas bon , et toute douleur n'est pas mauvaise, il nous appartient d ' en décider en tenant compte des conséquences. )

- ពួក Stoïciens ជឿថាព្រះអាទិទេព គឺជាធម្មជាតិ ពោលគឺអំពើល្អ និងអាក្រក់ ខុស និងត្រូវ គុណ និងទោស មានរូបជាស្រេច ក្នុងធម្មជាតិ ដូច្នេះធម្មជាតិ ជាអ្នកធ្វើឱ្យមនុស្សស្គាល់អំពើល្អ និង អាក្រក់ បន្ទាប់មកទើបមនុស្សកសាងអំពើល្អតាមធម្មជាតិ និងចៀសវាងអំពើអាក្រក់តាមធម្មជាតិដែរ ។ តាមទ្រឹស្តីនេះ, ព្រះអាទិទេព ហាក់ដូចជាមានផង ពុំ

មានផង ។ ការយកធម្មជាតិ ធ្វើជាទ្រឹស្តីមូលដ្ឋាន មានទំនាក់ទំនងខ្លះ នឹងព្រះពុទ្ធសាសនា ។ ជំនឿថាមានព្រះអាទិទេពបិតនៅលើការកេនូវគុណ និងទោស ដែលផ្តល់តម្លៃមកលើមនុស្ស ប៉ុន្តែ ដោយហេតុថាគុណ និងទោសទាំងនេះ ទោះបីព្រះអាទិទេពពុំបានផ្តល់មកក៏ដោយ ក៏គេអាចរកឃើញ នៅក្នុងធម្មជាតិដែរ ។

— លោក វ៉ុលទែរ (voltaire) យល់ថាព្រះអាទិទេពពុំមានរូបរាងដូចមនុស្សទេ ពោលគឺជាគូគ្គ អស្ចារ្យបតិណភាព ច្បាប់ នៃលោក ដែលផ្តល់នូវច្បាប់បញ្ញត្តិ ច្បាប់ប្រតិបត្តិឲ្យមនុស្សអាច ឬ ពុំអាចធ្វើបានដូចជា ច្បាប់ទូទៅដែលសកលលោកទទួលស្គាល់ ។ ច្បាប់ទាំងនោះហើយដែលលោកវ៉ុលទែរ ហៅថា អាទិទេព ។ យើងគោរព ច្បាប់គឺយើងគោរព អាទិទេព ហើយផ្ទុយទៅវិញ បើយើងពុំគោរពច្បាប់ទេ យើង

ក៏ពុំគោរពអាទិទេពដែរ ដូច្នេះតាមលោកក្នុងទេវព្រះ អាទិទេពហាក់ដូចជាពុំមាន ហើយប្រសិនបើមាន ក៏ពុំមានសកម្មភាពក្នុងលោកដែរ ។ ព្រះអាទិទេពគ្រាន់តែតំណាងច្បាប់ដែលសង្គមមនុស្សបានបង្កើតឡើង ។

– ក្ដាប់សេចក្ដី រួចមកហើយ យើងបានអធិប្បាយអំពីបញ្ហា ទុក្ខ ភារៈ សុខៈ ព្រមទាំងបញ្ហាទាំងឡាយ ដែលទាក់ទងនឹងទស្សនវិជ្ជា ។ បញ្ហាទាំងនេះ ជាជំនួយមូលដ្ឋានដល់ការសិក្សាវប្បធម៌ខ្មែរ ដែលទាក់ទង និង វប្បធម៌បរទេស ជាពិសេស គឺវប្បធម៌ឥណ្ឌា ដែលមានដើមកំណើតក្នុងការផ្សាយសាសនា ។ នៅប្រទេសឥណ្ឌាជំនាន់ដើម ប្រកបតំណោះបុរជនសូត្រសារ តើបិតនៅក្នុងសាសនា ដូច្នេះ សាសនាជាមូលដ្ឋាននៃវប្បធម៌ និង អរិយធម៌ទូទៅ ។

## ទំនាក់ទំនងរវាងវប្បធម៌ខ្មែរ
## និង
## វប្បធម៌ឥណ្ឌា

វប្បធម៌ខ្មែរ និងវប្បធម៌ឥណ្ឌា បានទាក់ទងគ្នាជាយូរយារណាស់មកហើយ តាំងពីរាជ្យព្រះបាទកៅណ្ឌិញ្ញ និងនាងលិវយីមកម៉្លេះ ។

តាមភាសាសំស្ក្រឹត :

ព្រះបាទកៅណ្ឌិញ្ញ និងនាងសោមា

តាមភាសាចិន :

ព្រះបាទហ៊ុនទៀន និងនាងលិវយី

តាមភាសាខ្មែរ :

ព្រះថោង និងនាងនាគ

ទំនាក់ទំនងនេះ ពុំបញ្ជាក់ថា ឥណ្ឌាជាខ្មែរដើមទេ បានសេចក្តីថា មុននឹងឥណ្ឌា ( ព្រះបាទកៅណ្ឌិញ្ញ ) ចូលមក ប្រទេសខ្មែរមានរួចស្រេច ដែលនៅសម័យនោះ គេ

ហៅថា នគរភ្នំ មានស្តេចស្រីមួយអង្គសោភព្យ នាមនាងនាគ.ៗ ប្រជាជាតិបានគោរពសត្វនាគជាទីសក្ការៈបូជា ៗ

បញ្ហាបានចោទសួរឡើងថា ហេតុអ្វីបានជាព្រះបាទកៅណ្ឌិញ្យធ្វើដំណើរមកស្រុកខ្មែរ ?

មានចម្លើយច្រើនយ៉ាង ពន្យល់ពីបញ្ហានេះ ៖

– មតិខ្លះថាព្រះបាទកៅណ្ឌិញ្យជាជាតិហិណ្ឌូ បានធ្វើដំណើរផ្សងព្រេងចេញពីប្រទេសឥណ្ឌា ផ្នែកខាងជើង កាត់តាមប្រទេសជ្វា ហើយបានមកសំណាក់នៅនគរភ្នំ ប៉ុន្តែដោយមានប្រជាជាតិមួយចំនួន ប៉ុនប៉ងប្លន់សំពៅរបស់ទ្រង់ ទ្រង់ក៏បានរៀបអភិសេក ជាមួយនាងនាគ ដែលរឿងព្រេង បានដំណាលថា នាងជាបុត្រីស្តេចភុជង្គនាគ ។

ពេលរៀបអភិសេក ព្រះបាទកៅណ្ឌិញ្យ ត្រូវតោងស្បៃតំណាងកន្ទុយនាគ តាមក្រោយនាងនាគ ជានិមិត្តរូបនៃការបញ្ជាក់នូវអំណាចរបស់ភរិយា លើ

ស្វាមី ( le matriarcat ) ។

- មតិខ្លះថា ព្រះបាទកៅណ្ឌិញ្ញជាឈ្មួញលក់កំណាត់ និងគ្រឿងទេស បានធ្វើដំណើរមកនគរភ្នំ ដើម្បីលក់ដូរ ព្រោះប្រជាជាតិនគរភ្នំ ពុំទាន់ចេះស្លៀកពាក់ នៅឡើយទេ ។

- មតិខ្លះថា ព្រះបាទកោណ្ឌិញ្ញកាលនៅប្រទេសឥណ្ឌា យប់មួយបានសុបិនឃើញ នូវស្រុតិនៃអាទិទេព ថាទ្រង់មានបុណ្យបារមី និងវាសនាត្រូវបានសោយរាជ្យ នៅនគរភ្នំ ទ្រង់ក៏ធ្វើដំណើរតាមសំពៅសំដៅមកនគរភ្នំ កាត់តាមប្រទេសជ្វា ។ មុនដំបូងប្រជាជាតិនគរភ្នំនេះ ពុំព្រមទទួលស្គាល់ សង្គ្រាម ក៏កើតមានឡើង ហើយនៅទីបំផុត ទ័ពព្រះបាទកៅណ្ឌិញ្ញ បានទទួលជ័យជំនះលើប្រជាជាតិនគរភ្នំ ។ បន្ទាប់មកទ្រង់បានរៀបអភិសេកជាមួយនាងនាគ បន្តពូជពង្សរៀងរហូតមក ។

មតិខ្លះទៀតថា ប្រជាជាតិឥណ្ឌា ដែលបានធ្វើដំណើរផ្សងព្រេងចេញពីប្រទេសរបស់ខ្លួន ព្រោះនៅក្នុងស្រុកមានសង្គ្រាមកើតឡើង ។

ប្រភពនៃទំនាក់ទំនង រវាងវប្បធម៌ខ្មែរ និងវប្បធម៌ឥណ្ឌា កើតមានឡើងតាំងពីពេលនោះមក ។ មធ្យោបាយនៃការផ្សាយវប្បធម៌របស់ពួកឥណ្ឌា គឺសាសនាហិណ្ឌូ ។ ឯកសារខ្លះបានចែងថា ព្រះពុទ្ធសាសនាក៏បានចូលមកព្រមគ្នា ជាមួយសាសនា ហិណ្ឌូដែរ ( Histoire du Cambodge de A. Meunier, PUF.)

មុនដំបូង ប្រជាជាតិខ្មែរគេ ពេញចិត្ត និងព្រះពុទ្ធសាសនាជាខ្លាំង ព្រោះជាសាសនា រំលាយវណ្ណៈក្នុងសង្គម ( le Bouddhisme rejette le système des castes ) ប៉ុន្តែ ក្រោយមកគេបោះបង់ ចោលព្រះពុទ្ធសាសនាបន្តិចម្តង ៗ រហូតដល់អស់លើង នៅសត-វត្សទី ៧ ។

បុព្វហេតុ នៃការបោះបង់ព្រះពុទ្ធសាសនា :

- ស្តេចកាន់សាសនាហិណ្ឌូ ហើយភាគច្រើនកាន់សាសនាព្រះឥសូរ ( sivaisme )

- ព្រះពុទ្ធសាសនា បានផ្សាយនូវបទបញ្ញត្តិ តឹងរឹងពេក ដែលប្រជាពលរដ្ឋជំនាន់នោះ ពុំអាចអនុវត្តតាមបានៗ រហូតមកដល់សតវត្សទី ១៣ ដែលកាលព្រះបាទជ័យវរ្ម័នទី ៧ ទើបព្រះពុទ្ធសាសនា មានកំណើតឡើងវិញ ប៉ុន្តែ ជាព្រះពុទ្ធសាសនាមហាយាន ( le Buddhisme mahayaniste) ដែលមានបទបញ្ញត្តិធូរស្រាលជាងហិនយាន (le Buddhisme hinayaniste) ពោលគឺយានធំទូលាយជាងយានតូច ។ ព្រះពុទ្ធសាសនាមហាយាន មានសន្ទុះខ្លាំងរហូត មកដល់សម័យលង្វែក ( សកម្មភាពរបស់ព្រះសង្ឃកាន់ជើងទំពាំ ) ទោះបីមានការរាក់រអួលខ្លះ ដែលជាប្រតិសកម្មនៃសាសនាហិណ្ឌូក៏ដោយ ៗ បន្តិចម្តងៗ

ព្រះពុទ្ធសាសនា មហាយាន បានកែប្រែ ទៅជាហិនយានវិញ ។

សព្វថ្ងៃនេះ តើព្រះសង្ឃខ្មែរកាន់ព្រះពុទ្ធសាសនា បែបណា ?

សំណួរនេះ ធ្វើឲ្យយើងពិបាកឆ្លើយ ពីព្រោះព្រះពុទ្ធសាសនារបស់ខ្មែរសព្វថ្ងៃ មានលក្ខណៈ បែបមហាយានខ្លះ បែបហិនយានខ្លះបែបហិណ្ឌូខ្លះ ពោលគឺបម្រុះគ្នា អាស្រ័យទៅតាមទំនោររបស់សង្គម ។ ប្រជាពលរដ្ឋពេញចិត្ត នឹងព្រះសង្ឃណា គេទៅធ្វើបុណ្យជាមួយព្រះសង្ឃនោះ មានខ្លះទៅពឹងពាក់ព្រះសង្ឃ រហូតដល់ចង់បានមន្តអាគមគាថា អួច គាម ប្តូ មន្តស្នេហ៍ទៀតផង ។

---

# ឥទ្ធិពលនៃសាសនាលើ
# បុរាណប្រាសាទខ្មែរ

ប្រាសាទខ្មែរនីមួយៗមានន័យទាក់ទងនឹងសាសនា។ ការស្ថាបនាប្រាសាទទាំងនោះ ពុំមែនដើម្បីជាព្រះរាជដំណាក់របស់ព្រះមហាក្សត្រទេ ប៉ុន្តែជាបូជនីយដ្ឋានសម្រាប់គោរពបូជានៅពេលមានពិធីម្តងៗ ។ ការសម្តែងសិល្បៈបង្ហាញអំពីព្រះមហាក្សត្រខ្មែរគង់នៅក្រាន្គប្រាសាទ ជាការកំណត់ប្រចាំ ។ ព្រះរាជដំណាក់របស់ស្តេចខ្មែរសម័យអង្គរធ្វើអំពីឈើ យើងបានរក្សាទុកសំណល់កំណាត់ឈើខ្លះជាគ្រឿងគ្រៅរបស់ព្រះរាជដំណាក់នៅសារមន្ទីរជាតិ ។

ប្រាសាទខ្មែរធំៗមានចំនួនប្រមាណ ៤០ បើរាប់ទាំងប្រាសាទតូចៗ មានទាំងអស់ចំនួនប្រមាណ ២០០ ប្រាសាទ ។

ហេតុអ្វីបានជាមានការស្ថាបនាប្រា-

សាទច្រើនដល់ម្ល៉េះ ?

ក/ បុព្វហេតុសាសនា

ការកាន់សាសនាខុសគ្នាបានធ្វើឲ្យស្តេចខ្មែរពុំព្រមគោរពបូជាប្រាសាទដដែល ៗ ហើយក៏បានចាត់ចែងឲ្យគេស្ថាបនាប្រាសាទដទៃទៀត តម្រូវតាមបំណង និង ជំនឿរបស់ព្រះអង្គ ។

ខ/ បុព្វហេតុកិត្តិយស

ការស្ថាបនាប្រាសាទជាសក្ខីភាព បញ្ជាក់នូវកិត្តិយសរបស់ព្រះមហាក្សត្រ គឺជាការបង្ហាញនូវថ្វីព្រះហស្ត ការប៉ុនប្រសប់ទេពកោសល្យ និងប្រាជ្ញាវៀងវៃរបស់ព្រះអង្គ ។ ការស្ថាបនាប្រាសាទប្រកបដោយក្បាច់ចម្លាក់ ល្អប្រណិត ផ្ទៃក្រឡាធំ ឬស្ទិត រាង់សមនយនខទៅល្អគ្រប់ទិសគ្មានទាស់ ខ្ពស់ត្រដែតទៅលើនភាល័យ ជាងប្រាសាទដទៃទៀត ជាការបញ្ជាក់នូវកិត្តិយសរបស់ព្រះមហាក្សត្រអ្នកស្ថាបនា ព្រមទាំងផ្សាយនូវបារមីរបស់ព្រះអង្គដល់ប្រជា

កស្តែទៀតផង ។

គ/ បុព្វហេតុទម្លាប់

ការសាងប្រាសាទក៏ជាទម្លាប់មួយដែរ ។ នៅពេលឡើងសោយរាជ្យម្តង ៗ ស្តេចខ្មែរទម្លាប់ឱ្យសាងតួករដ៏-នាញ ១ សង់ប្រាសាទទុកជាកេរ្តិ៍ដំណែលនៃរជ្ជកាលរបស់ព្រះអង្គ ។

ឃ/ បុព្វហេតុប្រវត្តិសាស្ត្រ

ការសាងប្រាសាទផ្សេង ៗ គ្នាជាគោលបំណងមួយទៀតរបស់ស្តេចខ្មែរ ដើម្បីឱ្យកិត្តិនាមរបស់ព្រះអង្គល្បីសុសសាយក្នុងប្រវត្តិសាស្ត្រ ។

ង/ បុព្វហេតុសង្គ្រាម

ការសាងប្រាសាទឱ្យកាន់តែធំ មាំទូលាយ មានប្រែកចេញចូលខ្វែងខ្វាត់ជាមធ្យោបាយដើម្បីទប់ទល់នឹងខ្មាំងសត្រូវ មានសៀម និងចាមជាដើម ។ នៅប្រាសាទអង្គរធំគេសង្កេតឃើញមានរូងក្នុងដីជាផ្លូវសម្ងាត់សម្រាប់ព្រះមហា

ក្សត្រ នៅពេលដែលសត្រូវចូលមកដល់ភ្លាមដោយមិនបាន
ប្រុងប្រយ័ត្នជាមុន ឬ ទប់ទល់នឹងសត្រូវពុំរួច

ច/ បុព្វហេតុផ្លាស់ប្តូរទីក្រុង

ការផ្លាស់ប្តូរទីក្រុងម្តងៗ តម្រូវឲ្យព្រះមហាក្សត្របញ្ជា
ឲ្យរៀបចំស្ថាបនាថ្មីៗ ជាដរាប ។

១ - នៅលើភ្នំគូលែន
- នៅ រលួស
- នៅ សៀមរាប
- នៅ លង្វែក
- នៅ ឧដុង្គ

១- សម័យមុនអង្គរ ( ឥទ្ធិពលសិវនិយម ) - សាសនាព្រះឥសូរ

- សម័យសំបូរ
  - ប្រាសាទសំបូរព្រៃគុក
  - ប្រាសាទ ភ្នំធំ
- សម័យព្រៃក្មេង
  - ប្រាសាទព្រៃក្មេង
  - ប្រាសាទអណ្តែត

- សម័យកំពង់ព្រះ
  - ប្រាសាទកំពង់ព្រះ
  - ប្រាសាទភូមិប្រាសាទ

២ - សម័យអង្គរ

ក/ សម័យគូលែន (សិរនិយម)
- ប្រាសាទដំរីក្រាប
- ប្រាសាទខ្ទីងស្វាប់
- ប្រាសាទរូបអារក្ស
- ប្រាសាទថ្មដាប់
- ប្រាសាទគគី
- ប្រាសាទអ្នកតា ...

ខ/ សម័យព្រះគោ (សិរនិយម)
- ប្រាសាទព្រះគោ
- ប្រាសាទបាគង
- ប្រាសាទលលៃ

គ/ សម័យបាខែង (សិរនិយម)
- ប្រាសាទបាខែង
- ប្រាសាទភ្នំក្រោម

ឃ/ សម័យកោះកេរ (សិរនិយម)
- ប្រាសាទកោះកេរ

ង/ សម័យបន្ទាយស្រី (សិរនិយម)
- ប្រាសាទបន្ទាយស្រី
- ប្រាសាទស្រឡៅ

ច/ សម័យឃ្លាំង (សិរនិយម)

- ប្រាសាទឃ្លាំង
- ប្រាសាទតាកែវ
- ប្រាសាទវិមានអាកាស
- ប្រាសាទភ្នំជីសូរ
- ប្រាសាទព្រះវិហារ
- ប្រាសាទចៅស្រីវិបុល

ឆ/ សម័យបាពួន (វិស្ណុនិយម)

- ប្រាសាទបាពួន
- ប្រាសាទវត្តឱ្ហា
- ប្រាសាទមេបុណ្យ

ជ/ សម័យអង្គរវត្ត (វិស្ណុនិយម)

- ប្រាសាទអង្គរវត្ត
- ប្រាសាទបន្ទាយសម្រែ
- ប្រាសាទព្រះពិធូរ
- ប្រាសាទធម្មនន
- ប្រាសាទវត្តអធ្វា
- ប្រាសាទចៅសាយ

ឈ/ សម័យបាយ័ន (មហាយាននិយម)

- ប្រាសាទបាយ័ន
- ប្រាសាទតាព្រហ្ម
- ប្រាសាទព្រះខាន់
- ប្រាសាទបន្ទាយក្តី
- ប្រាសាទតានៃ
- ប្រាសាទបន្ទាយឆ្មារ

# អំពីហិណ្ឌូនិយម

## l'Hindouisme

គឺជាទ្រឹស្តីរបស់ពួកហិណ្ឌូ ឬពួកព្រាហ្មណ៍ដែលនិយមតាមសាសនាហិណ្ឌូនៅប្រទេសឥណ្ឌា ។ សាសនាហិណ្ឌូមានវិវត្តន៍ច្រើនយ៉ាងទៅតាមជំនឿនៃតំបន់នីមួយៗ ។ ការគោរពព្រះអាទិទេពខុសគ្នា ការនិយមឲ្យតម្លៃព្រះអាទិទេពខុសគ្នា ធ្វើឲ្យមានការពិបាកហៅឈ្មោះសាសនានៅប្រទេសឥណ្ឌា សូម្បីតែព្រះពុទ្ធសាសនាក៏មាននៅប្រទេសឥណ្ឌាដែរ ។ គេក៏បានបង្រួមសាសនាទាំងនោះសន្មតហៅជាសាសនាហិណ្ឌូ ។ គេបានបញ្ចូលតួអង្គព្រះពុទ្ធជាអវតារទី ៩ នៃព្រះវិស្ណុ ប៉ុន្តែអ្នកកាន់ព្រះពុទ្ធសាសនាពុំយល់ព្រមឲ្យសាសនារបស់ខ្លួនឋិតនៅក្នុងក្រុមហិណ្ឌូនិយមទេ ។

ហេតុអ្វីបានជាមានបណ្ដាសាសនាច្រើនម៉្លេះនៅប្រទេសឥណ្ឌា ? ជាថៃជន្យ ឬ មានបុព្វហេតុ ?

– មតិខ្លះថា ផាថៃជន្យ

– មតិខ្លះទៀតយល់ថា ទីណាមានសាសនាច្រើនទីនោះមានទុក្ខច្រើនដែរ ព្រោះមានការខ្វែងគំនិតគ្នាច្រើន ។ សាសនា គឺការអប់រំ បើមានសាសនាច្រើន មនុស្សល្អក៏មានច្រើន បញ្ហាទោតក៏ច្រើន ទុក្ខវេទនាក៏ច្រើន ។

ការចាប់ផ្ដើមនៃសាសនាហិណ្ឌូ គឺវេទនិយម (le Védisme)

## ១ – អំពីវេទនិយម

គឺជាទ្រឹស្ដីនិយមតាមបទបញ្ញត្តិនៃគម្ពីរវេទ ( Veda )។ គម្ពីរវេទគឺជាកម្រងឯកត្តបទទាំងឡាយអធិប្បាយអំពីសាសនានៃពួកអារ្យ៉ែន (Aryens) ដែលជាជនជាតិមួយក្រុម មានកំណើតនៅតំបន់ឥណ្ឌូ-អឺរ៉ុប ហើយបានមកលុកលុយផ្សាយវប្បធម៌ និងអរិយធម៌របស់ខ្លួន នៅតំបន់ តាំងពីប្រទេសអ៊ីរ៉ង់ដល់ប្រទេសឥណ្ឌា ។

វេទ ជាអ្វី ?

..ពួកហិណ្ឌូចាត់ទុកថា វេទ ជាពុទ្ធិពិសិដ្ឋ (connaissance sacrée) ដែលព្រះអាទិទេពបានផ្ដល់អំណោយមក ។

ព្រះអាទិទេពបានប្រគល់គម្ពីរវេទឲ្យទៅមនុ (Manu) ដែលជាតំណាងរបស់ខ្លួន ហើយជាមនុស្សចម្បងបំផុតក្នុងលោក ។ មនុបានផ្សាយគម្ពីរវេទឲ្យពួក ឫសិ ( Rsi ) តាមស្រុតិ (révélation) ។ ពួកឫសិបានចងក្រងបទបញ្ញាទាំងឡាយនោះជាគម្ពីរ ហើយផ្សាយឲ្យទៅពួកព្រាហ្មណ៍ តាមការរៀនតាម សូត្រតាម យល់តាម ហើយពុំមានសិទ្ធិដេញដោលសួរកែខុសឬត្រូវឡើយ ព្រោះគម្ពីរវេទជាអំណោយរបស់ព្រះអាទិទេព ដូច្នេះបទបញ្ញា ទាំងឡាយក្នុងគម្ពីរ មានលក្ខណៈជាសច្ចៈ ។ ពួកព្រាហ្មណ៍មានសិទ្ធិផ្ដាច់មុខ ក្នុងការផ្សាយគម្ពីរវេទ ។

មតិខ្លះថាគម្ពីរវេទ គឺជាលទ្ធិរបស់ពួកអារ្យេន ដែលត្រូវការផ្សាយអំណាចរបស់ខ្លួន ឲ្យនគរបំណុះ គោរពស្ងប់ស្ងែង ប៉ុន្តែការផ្សាយនេះ មានវិវត្តន៍ទៅតាមទំនោររបស់

សង្គម និងទៅតាមពេលវេលានៃការលុកលុយនៅប្រទេសផ្សេងៗ ។

ប្រភពខ្លះថាគម្ពីរវេទ មានកំណើតឡើងជាង ១៥០០ ឆ្នាំ មុនគ្រិស្តសករាជ ។ គម្ពីរវេទបានផ្លាស់ប្ដូរទៅតាមវិវត្តន៍ដូចតទៅ ៖

ក/ សម័យគម្ពីរសំហិតា

គម្ពីរសំហិតាជាកម្រងនៃអត្ថបទកំណាព្យ និយាយអំពីការសរសើរព្រះអាទិទេព ការលើកតម្កើងព្រះគុណូបការៈរបស់ព្រះអាទិទេព ដែលបានប្រោះព្រំដល់មនុស្ស សត្វទាំងឡាយក្នុងធម្មជាតិ ។

ខ/ សម័យគម្ពីរព្រាហ្មណៈ

គឺជាគម្ពីរដែលនិយាយអំពីការណែនាំរបស់ព្រះព្រហ្មដល់ពួកព្រាហ្មណ៍អំពីកិច្ចរៀបចំពិធីបូជាសួងព្រះអាទិទេព ធ្វើយ៉ាងណាឲ្យមនុស្សគ្រាន់តែគោរពព្រះអាទិទេព មានជំនឿគ្រាន់តែខ្លាំងឡើងចំពោះព្រះអាទិទេព ។

គ/ សម័យគម្ពីរអរណ្យកៈ

គម្ពីរនេះ និយាយអំពីមន្តអាគម ដែលត្រូវយកទៅសិក្សានៅក្នុងព្រៃ ដើម្បីចៀសវាងគ្រោះថ្នាក់ ដែលអាចកើតមានឡើង ។

ឃ/ សម័យគម្ពីរឧបនិស័ទ

គម្ពីរនេះ និយាយឡើងវិញនូវគោលសំខាន់ ៗ នៃគម្ពីរទាំង៣ រួចមកហើយ ប៉ុន្តែ បានបន្ថែមគ្រឿងបទបញ្ញាវៈដែលពួកព្រាហ្មណ៍ត្រូវដឹង ឯពួកក្នុងដទៃទៀត ពុំត្រូវដឹងទេ ( Esotérisme ) ។ លើសពីនេះទៅទៀត គម្ពីរឧបនិស័ទ អធិប្បាយអំពីការកើតស្លាប់របស់មនុស្ស ។ កាលស្លាប់ទៅ អាត្មន្នត្រូវវិលទៅជួបនឹងព្រះព្រហ្ម ព្រោះអាត្មន្នជាសារជាតិបរិសុទ្ធ តំណាងនូវកម្ម ( Karma ) ឬកម្មដែលខ្លួនបានកសាងកាលខ្លួននៅជាប់នឹងសរីរៈ ឬកាយរួចហើយទើបព្រះព្រហ្មបញ្ជាឲ្យអាត្មន្នចាប់កំណើតជាថ្មី ទៅតាមកម្ម ដែលខ្លួនបានកសាង ។ កាលនៅជាមួយព្រះ

ព្រហ្ម អាត្មនស្គាល់ល្អ និងអាក្រក់ ខុសនិងត្រូវ យល់ថា ព្រះព្រហ្ម ជាអង្គអាទិទេពប្រសើរផុត ។ លុះអាត្មនចាកចេញពីព្រះព្រហ្ម អាត្មនបានកើតកំណើតរបស់ខ្លួន ព្រោះមានមាយា ឬអវិជ្ជាមកបិទបាំង ដែលជាបុព្វហេតុនៃទុក្ខវេទនា ។

អ្នកសិក្សាគម្ពីរវេទ បន្តពីពួកព្រាហ្មណ៍ ពុំមែនត្រូវសិក្សាតាមស្រុតិទេ ប៉ុន្តែតាមសម្រឹតិ (smrti : mémoire) ឬការចងចាំមាត់ សូត្រតាម ចាំតាម យល់តាមដែលគេឲ្យឈ្មោះថា « ពុទ្ធិគំណាម » ។

គម្ពីរវេទទាំងអស់មាន ៤ :

- គម្ពីរ ឫគវេទ ( Rgveda )

គឺជាគម្ពីរនិយាយសរសើរទេវតាផ្សេង ៗ ដែលឋិតនៅក្នុងធម្មជាតិយើងនេះ ដូចជាព្រះអាទិត្យ ព្រះចន្ទ ព្រះពាយ ព្រះធរណី ព្រះអគ្គី ព្រះវរុណ .. គម្ពីរឫគវេទមានចែកជា ១.០២៨ សូក្ត ( hymnes )

ឬជប់មណ្ឌល ៗ ១ ឬក្ខមាន ៤៨ គាថា ៗ

- គម្ពីរ យជុរវេទ (Yajurveda)

គឺជាគម្ពីរនិយាយពីការបន់ស្រន់អង្វរករ ទេវតានៅឋានលើ ឲ្យចុះមកជួយ ៗ ផ្នែកខ្លះនិយាយដូចគម្ពីរឫគវេទដែរ ផ្នែកខ្លះទៀតនិយាយអំពីពិធីអស្វមេធ ៗ យជុរវេទមានបែកជា ២ ផ្នែក គឺ យជុរវេទខ្មៅ និយាយដូចឫគវេទដែរ រីឯយជុរវេទស ពិតមែនតែកើតក្រោយយជុរវេទខ្មៅ មានន័យខ្លឹមសារ ច្រើនជាង ៗ

- គម្ពីរ សាមវេទ ( Sâmaveda )

គឺជាគម្ពីរនិយាយអំពីពិធីបូជាយញ្ញ និងមន្តគាថាផ្សេង ៗ ៗ មន្តគាថាមាន ២ បែប ៗ មន្តគាថាមួយសម្រាប់រៀនក្នុងស្រុក មួយទៀត សម្រាប់រៀនក្នុងព្រៃ ព្រោះគាថាមានគ្រោះថ្នាក់ចង្រៃផ្សេង ៗកើតឡើង ។ ក្រៅពីនោះ មានអត្ថបទកំណាព្យខ្លះនិ-

យាយសរសើរព្រះអាទិទេព ដូចមានក្នុងគម្ពីរឫគ្វេទ

ដែរ ។

- គម្ពីរ អថវ៌វេទ ( Atharvaveda )

គម្ពីរអថវ៌វេទមាន ២០ សៀវភៅ ចែកជា ២០កាណ្ឌ រួមមកមាន ៦.០០០គាថា ។ សៀវភៅទាំងនុ៎ះយេ បង្រៀនអំពីមន្តអាគម ដើម្បីសម្រេចបំណងដែលជា សេចក្ដីត្រូវការរបស់អ្នកស្រុក ។ គេសង្កេតឃើញ មាន ៖

- មន្តអាគមស្ដោះពិសពស់
- មន្តអាគមហៅពស់
- មន្តអាគមបណ្ដោះគ្រោះថ្នាក់
- មន្តអាគមឈើគកសី
- មន្តអាគមស្នេហ៍
- មន្តអាគមឲ្យតរជ័យពេលអាពាហ៍ពិពាហ៍
- មន្តអាគមសម្រាប់បូជាសព . . .

សង្ខេប : ផ្នែកខ្លះទៀត នៃគម្ពីរអថវ៌វេទ មានអធិ-ប្បាយ ស្តីពីមូលការណ៍លោក ដែលមានខ្លួនជា ការពន្យល់ស្តីពីដំណើរ ប្រព្រឹត្តទៅ នៃប្រព័ន្ធព្រះ អាទិត្យ (principe cosmique à forme solaire) ។ ផ្នែកខ្លះទៀតមានអធិប្បាយស្តីពីវត្ថុមាន នៃលោក និងបុរស (purasa) ដែលព្រះអាទិទេពបានឱ្យ កំណើតមក ។ សេចក្តីអធិប្បាយទាំងនេះ មាន លក្ខណៈជាការពន្យល់បែបទស្សនវិជ្ជា ។

ភ្ជាប់សេចក្តី -

វេទនិយម ដែលយើងបានអធិប្បាយរួចមក ហើយ បានលាតត្រដាងអំពីទ្រឹស្តីទាំងឡាយ ក្នុង សាសនាព្រាហ្មណ៍ មិនចំពោះសាសនា នៃអង្គអាទិ-ទេពណាមួយឡើយ ។ ការនិយមទូទៅបែបនេះ បានធ្វើឱ្យជំនឿមានលក្ខណៈពុំច្បាស់លាស់ គេ បែរចិន្តគំនិតទៅរកព្រះអាទិទេពអង្គណា ដែលគេ

តោញចិត្ត ។ ការចាប់ផ្ដើមចលនាថ្មីមួយទៀត

ក៏កើតមានឡើង ធ្វើឲ្យគេមានភក្តិ (Bhakti) ចំពោះ

លើអន្លំព្រះព្រហ្ម ព្រះសិវៈ ( រុទ្រ ) និងព្រះវិស្ណុ

( នារាយណ៍ ) ដែលគេឲ្យឈ្មោះថាព្រាហ្មណ៍និ

យម ( Brahmanisme ) ។

## ២ - អំពីព្រាហ្មណ៍និយម

le Brahmanisme

គឺជាទ្រឹស្ដីដែលនិយមតាមបែបពួកព្រាហ្មណ៍ ។ ពួកព្រាហ្មណ៍ជាអ្នកគោរពបូជាព្រះអាទិទេព ។ គេជឿថាបញ្ហាអាទិទេពពុំមែនជាបញ្ហាអស្ចារ្យទេ គឺជាបញ្ហា ដែលគេបាត់បញ្ហាលគន់ ទស្សនវិជ្ជាវិបនិយម អាស្រ័យហេតុនេះហើយ បានជាគេធ្វើឲ្យព្រះអាទិទេពរបស់គេ ជាតួអង្គមានរូបរាង មានគ្រួសារ មានបញ្ហាដូចមនុស្សដែរ ។

ព្រះអាទិទេពសំខាន់ ៗ មាន ៣ អង្គ ចំណែក

ព្រះអាទិទេពពាយវ្យមានច្រើនអង្គ ៖

ព្រះអាទិទេពសំខាន់ៗ ( Dieux principaux) ៖

- ព្រះព្រហ្ម (Brahma)
- ព្រះសិវៈ (siva)
- ព្រះវិស្ណុ ( visnu )

ព្រះអាទិទេពរាយរង (Dieux secondaires) ៖

- ព្រះអាទិត្យ
- ព្រះចន្ទ
- ព្រះធរណី
- ព្រះគង្គា
- ព្រះវាយ
- ព្រះវរុណ

ក - អំពីព្រះព្រហ្ម

ព្រះព្រហ្មមានលក្ខណៈពិសេស សម្រាប់ សំគាល់ដូចតទៅ ៖



- មុខ ៤
- ដៃ ៤ កាន់គម្ពីរវេទ ទាំង ៤
- កាយសម្បុរផ្កាឈូក
- សម្លៀកបំពាក់ពណ៌ស
- កេតនភ័ណ្ឌ : ថូ- ផ្គាំ- ស្លាបព្រា- ចាស
- ជួនកាលព្រះព្រហ្ម ឈរស្ងៀម ជួនកាលទៀត អង្គុយនៅលើផ្កាឈូក ដែលដុះចេញ

ពីផ្ចិតរបស់ព្រះវិស្ណុ ។ មានស្នាមខៀវក ជាខ្លះ ដែលជាព្រះព្រហ្មជាព្រះអាទិទេព កើតឯង ឬ ស្វ័យម្ភូ ។

- មានសត្វហង្សជាជំនិះ
- មានមហេសី ១ មួយអង្គ នាមនាងសរស្វតី
- មានបុត្រ ៣ អង្គ គឺ ៖ ព្រះទក្ស ( Daksa ) ព្រះភ្ឫគុ ( Bhargu ) និង ព្រះនាងសំធ្យា ( Samdhyâ ) ឬសន្ធ្យា ( Crépuscule )

សង្កេត គម្ពីរវេទបានថែងថា ព្រះព្រហ្ម ជះ ព្រះអាទិទេពច្បងគេ ជាព្រះអាទិទេពបង្កើតលោក: និងការ: ព្រមទាំងជាអ្នកបង្កើតគម្ពីរវេទទាំង ៤ ទៀតផង ប៉ុន្តែ ព្រះព្រហ្មពុំមានសកម្មភាពអ្វីសំខាន់ទេ ក្នុងសាសនាហិណ្ឌូ ។ ប្រទេសខ្មែរយើង ពុំដែលបានកាន់ សាសនាព្រះព្រហ្មសោះឡើយ ។ គេឃើញមានរូបចម្លាក់ព្រះព្រហ្មបន្តិចបន្តួច ។ ព្រះព្រហ្ម កាលបានបង្កើតលោក: ការ: និងគម្ពីរវេទរួច

ហើយ ក៏គង់នៅ ស្ងៀម លែងមានចលនាអ្វីទាំងអស់ ។ គម្ពីរវេទបានចែងថា ( តាម Inde Classiqne ) ព្រះសិវៈ និងព្រះវិស្ណុ ក៏ជាការបង្កើតរបស់ព្រះព្រហ្មដែរ គោលគឺ ព្រះព្រហ្មអាចបែងភាគជាព្រះសិវៈក៏បាន ព្រះវិស្ណុក៏បាន ។

( Brahma est un dieu créateur du monde , des êtres et des 4 Veda )

២ អំពីព្រះសិវៈ

ព្រះសិវៈមានលក្ខណៈពិសេសសម្រាប់សម្គាល់ដូចតទៅៈ



៣ - នាងកុមារី (Kumarî)

៤ - នាងទេវី (Devî)

៥ - នាងមហាទេវី (mahadevî)

— មានបុត្រ ២ អង្គគឺ ស្កន្ធ (Skanda) ឬ ការទិទេពតំណាងអ្នកស្នេហាសង្គ្រាម និង គណេស (Ganeça) ដែលមានខ្លួនជាមនុស្ស ក្បាលជាដំរីភ្លុកមួយ ហើយមានមុខងារជាមេគណៈនៃពពួកទេវៈ ។ ព្រះការទិទេពទាំងពីរអង្គនេះជាបុត្ររបស់ព្រះសិវៈ និងនាងទុរគា ។ នាងទុរគាជាមហេសីដើមរបស់ព្រះសិវៈ ហើយជាបុត្រីរបស់ព្រះទក្ស ។ នាងយល់ព្រមលោតទៅក្នុងភ្លើង ឲ្យគេបូជាជីវិត ជាមួយស្វាមី ដើម្បីបញ្ជាក់នូវភក្តីភាពរបស់នាង (Durgâ se voue aux flammmes par dévotion à son mari, résultante ou origine de la coutume du brûlage des veuves. IC page 522 .)

-- មានទីតាំងនៅលើភ្នំកៃលាស នាព្រៃហេមពាន្ត

( IC page 515 )

— គេតឧក័ណ្ឌ : ធ្នូ អជគវ: , ស្គរ , ដំបងធំ ខ្សែបង សម្រាប់ចងពួកសតាវ:គាត្រក់ , ប្យូក ផ្ទីប ( trident ) ឬត្រីសូល ។

សង្កេត.--

ទី១.- មហេសី ឬ សក្តិរបស់ព្រះសិវៈ មានន័យដូចតទៅ :

- ទុរគា = ស្ត្រីដែលចេះធ្វើមិនដឹងមិនពុ
- ឧមា = ស្ត្រីជាទីពេញចិត្ត
- គៅរី = ស្ត្រីសម្បុរទង់ដែង
- កាលី = ស្ត្រីសម្បុរខ្មៅ
- ចន្ទី = ស្ត្រីកំណាច
- បរិតី = បុត្រីម្ចាស់ភ្នំ
- កុមារី = ស្ត្រីក្រមុំបរិសុទ្ធ
- ទេវី = ទេពកញ្ញា

- មហាទេវី = ទេពកញ្ញាដ៏ប្រសើរ

ទី២.- ប្រវត្តិនៃលិង្គព្រះសិវៈ ឬលិង្គព្រះឥសូរ

គម្ពីរ បុរាណ បានចែងថា ព្រះសិវៈជាព្រះអាទិទេពបំផ្លាញលោក (Dieu destructeur) ។

ក្នុងសម័យមួយដែលមានទំនាស់សាសនា កើតឡើងពេលសាសនា ព្រះព្រហ្ម ព្រះសិវៈ និងព្រះវិស្ណុ សាសនាព្រះសិវៈដែលមាន សិវបរិស័ទ ច្រើនបានទទួលជ័យជំនះ ។ តាំងពីពេលនោះមក គេបានដម្កល់ព្រះសិវៈជាព្រះអាទិទេពប្រសើរបំផុត គេបានបន្ថែមមុខងារជាព្រះអាទិទេពបង្កើតលោក (Dieu créateur et destructeur) ។ ការគោរពកោតក្រាបព្រះឥស្សូរ ឬការអះអាងប៉ុណ្ណោះពុំគ្រប់គ្រាន់ទេ គេត្រូវកសាងវត្ថុជានិមិត្តរូបនៃការបង្កើតរបស់ព្រះឥសូរ គឺលិង្គព្រះឥសូរ ឬ សិវលិង្គ និង យោនី នាង ទុគ៌ា (le culte du linga et de la yoni matrice) ។

ម្យ៉ាងទៀត លិង្គព្រះឥសូរជានិមិត្តរូបនៃ ស្វ័យម្ភូ

(Svayambhû) ឬកំណើតឯងនៃព្រះឥសូរ ។ ក្នុងសិល្បៈចម្លាក់ខ្មែរគេបានឆ្លាក់ លិង្គព្រះឥសូរ ពីជ្រុងពណ៌ិសឲ្យមាន កងបួនជ្រុងក៏មាន ៦ ជ្រុងក៏មាន ៨ ជ្រុងក៏មាន ហើយតម្កល់ជានិច្ចកាលនៅលើយោនីនាង ទុគ៌ា ដែលមានផលប្រយោជន៍សម្រាប់ប្រើជាជើងទ្រផង (piédestal) ។

ហេតុអ្វីបានជាគេតម្កល់លិង្គព្រះឥសូរជានិច្ចកាលលើយោនីនាងទុគ៌ា ?

នេះជាប្រវត្តិមួយដំណាលអំពីមរណភាព របស់ព្រះឥសូរនៅលើទ្រូងនាងទុគ៌ា ឬ ស្លាប់នៅលើបង្គន់ក្នុងពេលរួមសង្វាស (IC n° 1062 page 517) ។

ចំពោះអ្នកគោរពលិង្គព្រះឥសូរ គេបានធ្វើពិធីបុណ្យមួយក្នុងមួយឆ្នាំម្តង មានឈ្មោះថា សិវរាត្រី ឬរាត្រីព្រះឥសូរ ។ ពេលយប់នៃពិធីបុណ្យ គេប្រមូលគ្នាទៅមុជទឹកនៅទន្លេគង្គា (Gangâ) ដើម្បីលាងបាប ។ លុះត្រឡប់មកវិញ គេបានដងទឹកទន្លេគង្គាមកស្រោចលើលិង្គព្រះឥសូរ

បង្ហូរទៅលើយោនីនាង ទុគ៌ា ជានិមិត្តរូប នៃការបង្កើតលោកៈ ។ ចំពោះស្រុកណាដែលនៅឆ្ងាយពីទន្លេគង្គា គេយកផ្លែដូងមកប្រើជំនួស ។

ទី៣.- ព្រះសិវៈ មានឈ្មោះច្រើន ជួនកាលគេហៅ ៖

— ព្រះឥសូរ (បែបខ្មែរ)
— ព្រះឥសូរៈ ( Içvara )
— ព្រះរុទ្រៈ ( Rudra )
— ព្រះហរៈ ( Hara )
— ព្រះឧគ្រៈ ( Ugra )
— ព្រះអឃោរៈ ( Aghora )
— ព្រះភៃរវៈ ( Bhairava)

នៅពេលព្រះសិវៈបែងភាគជា ព្រះភៃរវៈ ពេលនោះ ព្រះសិវៈមានក្បាលធំ ក្បាលពោះធំសម្បុរខ្មៅ មានពស់វែកតិចជុំវិញខ្លួន កាចសម្បាចស៊ីសាច់មនុស្សគ្មានញញើត ផឹកឈាមមនុស្ស ហុតឈាមមនុស្សជំនួសទឹកស្រវឹង ព្រះសិវៈនឹងតាំងខ្លួនជាស្ដេចមារ (Mâra) ជាមួយសមាគិក ៦៤ រូបទៀត

ដឹកនាំដោយព្រះកាម (Kâma) ប្រឆាំងនឹងព្រះពុទ្ធអង្គ កាលព្រះអង្គគង់នៅលើបល្ល័ង្ក មានព្រះធរណីជាសាក្សី (IC n· 1053 page 512) ។ ព្រះសិវៈតាំងខ្លួនជាព្រះបិតានៃអំណាចលោកៈទាំង៥ ឬ បញ្ចក្រឹត្យ (origine des 5 pouvoirs cosmiques: production. conservation, destruction, incarnation, délivrance) ដូចជាការបង្កើត ការរក្សា ការបំផ្លាញ ការបែងភាគ និងមោក្ស ។

មោក្ស (Moksa) គឺការផ្តាច់ខ្លួនចេញពីកលវដ្តសង្សារ ឬ បញ្ចប់ការវិលកើតវិលស្លាប់, ជម្រះឲ្យអស់នូវ កម៌ន (Karman), ចាកចេញពីចំណងគ្រប់ប្រការ កើតឡើងដោយការផ្សារភ្ជាប់រូប និង លោកៈ ជាសំខតធាតុ ធ្វើឲ្យរួចចាក នូវអបាយមុខសព្វយ៉ាង ការឈឺចាប់ និង អវិជ្ជា ។ ពេលណាគេអាចសម្រេចបាន នូវមោក្ស ពេលនោះ អាត្មន មានបុព្វសិទ្ធិវិលទៅជួប នឹងព្រះព្រហ្ម ។ កាលបានជួបព្រះព្រហ្មហើយ អាត្មនហាក់ដូចមានពន្លឺ (Illumination,

មើលមកឃើញកំហុសគ្រប់បែបយ៉ាងនៃលោក ។

ទី៤ .- ជួនកាលព្រះសិវៈតែងបានជាអ្នករបាំ(çiva dansant) ឬជាតាបស (Ascète) ដែលជាម្ចាស់នៃពួកយោគិន ( le maître des Yogin ) ឬ អ្នកធ្វើពិធីយោគ ( Yoga ) ។

គ/ អំពីព្រះវិស្ណុ

ព្រះវិស្ណុ មានលក្ខណៈពិសេស សម្រាប់សម្គាល់ ដូចតទៅ ៖

មុខមានតែមួយគត់

– ដៃដម្បូងមាន ២ តែអាចធ្វើឱ្យកើតជា ៤កំផាង ជា ៨ កំផាង (ដៃ ៨ ចាប់ផ្ដើមមានពីសតវត្សទី៨មក)

– ពាក់មួកកងរមូរមូល

– សម្លៀកបំពាក់ពណ៌លឿង

– មានគ្រុឌជាជំនិះ

– មានមហេសី ២ អង្គ នាមនាងលក្ស្មី ទេពធីតា តំ

ណាន់ទ្រព្យសម្បត្តិ និងនាងស្រី ទេពធីតា តំណាង

សោភ័ណភាព

– មានបុត្រមួយអង្គ ព្រះនាមកាម ( Kâma )

– កេតនព័ណ៌ : កង់ចក្រ ដំបងធំ ផ្កាឈូក ខ្យងស័ង្ខ ធ្នូ ដាវ

– មានមុខងារជាអ្នកគ្រងលោក : ( Dieu conservateur du Cosmos )។

ដូច្នេះ ព្រះវិស្ណុនិងព្រះសិវៈ មានសកម្មភាពផ្ទុយគ្នា ។ សង្គ្រាមមួយបានកើតឡើង រវាងទេពទាំង ២ អង្គនេះ ។ លោកហរិវង្សា បានរៀបរាប់យ៉ាងវែង អំពីសង្គ្រាមនេះ ដែលមានព្រះព្រហ្មជាអាជ្ញាកណ្ដាល ។

សង្កេត ដោយហេតុថាព្រះវិស្ណុ មានមុខងារជាអ្នកជួយទ្រទ្រង់លោក : ព្រះវិស្ណុត្រូវបែងភាគជាអវតារ (incarnation de Dieu) ដើម្បីរៀបចំច្បាប់ទម្លាប់ឲ្យបានត្រឹមត្រូវ

(Protéger et rétablir le dharma) ។ ព្រះវិស្ណុ

មានអវតារ ១០ យ៉ាង ៖

– មត្ស្យា (Matsya) ត្រីបានជួយជីវិតមនុ ( Manu ) ឲ្យរួចពីទឹកជំនន់ បង្កិតឡើង ដោយយក្សឈ្មោះ ហយគ្រីវៈ ។

– កូរម ( Kurma ) អណ្ដើកជួយទប់ភ្នំមន្ទរកុំឲ្យលិច ដើម្បីបាចទឹកសមុទ្រទឹកដោះឲ្យវិល ក្នុងបំណងរកទឹកអម្រឹត ដែលវង្វេងបាត់ទៅបាតសមុទ្រ កាលទឹកជំនន់ ។

វរាហ (Varâha) ជ្រូកព្រៃ បានសម្លាប់ ហិរណ្យាក្ស ដែលចុះទប់ផែនដីឲ្យទៅជាទឹកសមុទ្រ ។

– នរសិង្ហ ( Narasimha ) បានសម្លាប់ខ្លួនប្រុសហិរណ្យក្សឈ្មោះ ហិរណ្យកសិបុ ដែលបានសុំពរពីព្រះព្រហ្ម កុំឲ្យគេសម្លាប់ក្នុងពេលយប់ក្ដី ថ្ងៃក្ដី អាទិទេពក្ដី មនុស្សវិរៈពាក្ដី ។ ដូច្នេះ ដើម្បីសម្លាប់

យក្សនេះស្លាប់ ព្រះវិស្ណុត្រូវបែងកាយជានរសិង្ហ ដែលមានខ្លួនជាសិង្ហ ក្បាលជាមនុស្ស ហើយសម្លាប់យក្សក្នុងពេលព្រលប់ ( crépuscule ) ។

- វាមន ( Vâmana ) មនុស្សតឿ បានបង្ក្រាបយក្សឈ្មោះ ពលិ (Bali) ដែលមានបំណងយកទឹកដីទាំងអស់គ្រប់គ្រង ។ ព្រះវិស្ណុ បែងកាយជាមនុស្សតឿសុំដីយក្ស ៣ ជំហាន សម្រាប់ទុកជម្រកដល់មនុស្សលោក ។ យក្សពលិយល់ព្រម ព្រះវិស្ណុ ក៏វាតខ្លួនយ៉ាងធំ ឈានមួយជំហានបានផែនដីយើងនេះ ។

- បរសុរាម ( Paraçurama ) អវតារ កាន់ពូថៅដើម្បីរំដោះមនុស្ស ឲ្យចេញពីការសង្កត់សង្កិន របស់ស្ដេចមានស្ដេច កាតិវីរិយ ( Kârtavirya ) ជាដើម ។ បរសុរាម ធ្លាប់បានសម្លាប់ស្ដេច ២១ ដង ។ ពូថៅរបស់បរសុរាម ជាអំណោយរបស់ព្រះសិវៈ ។

- រាម ( Râma ) ជាតួអង្គសំខាន់ក្នុងរឿងរាមាយណៈ

ព្រះរាម មានមុខងារសម្លាប់ក្រុងរាពណ៍ ជាយក្សឃោរឃៅ ដើរកំហែងគម្រាមឋានទេវលោក និងមនុស្សលោក ប៉ុន្តែក្រុងរាពណ៍បានសុំពរព្រះព្រហ្មកុំឲ្យអាទិទេពក្តី មនុស្សក្តី យក្សក្តី អាចសម្លាប់ខ្លួនបាន ។ ព្រះវិស្ណុយល់រឿងនេះ ក៏បានបែងភាគជាព្រះរាម ដែលជាមនុស្សទេវៈ (demi-dieu) ដើម្បីសម្លាប់ក្រុងរាពណ៍ ។ ខ្លះថាព្រះរាមជាមនុស្សអវៈតារ ( avatar humain ) ឯនាងសីតា ជាអវតារនៃនាងលក្ស្មី ( Laksmî ) ដែរ ។

– ក្រឹស្នៈ ( Krisna )

គឺជាអវតារទី ៨ នៃព្រះវិស្ណុ ដែលមានមុខងារអប់រំមនុស្ស ឲ្យបានសះស្រេច នូវមោក្ស (délivrance) ដើម្បីផ្ដាច់ខ្លួនចេញពីវដ្ដសង្សារ ជាពិសេស•គឺផ្ដាច់ខ្លួនចេញពីស្ដេចកំណាចមួយអង្គឈ្មោះកំស (Kamsa) ដែលមានអធិប្បាយខ្លះក្នុងរឿង មហាភារតះ ។

ព្រាហ្មណ៍ នារទ បានទស្សន៍ទាយថា ស្ដេចកម្សត្រូវស្លាប់ដោយសារក្មួយរបស់ព្រះអង្គ ដែលត្រូវជាបុត្ររបស់នាងទេវកី ( Devakî ) ។ ព្រះបាទកម្ស បានសម្លាប់បុត្រទាំងអស់របស់នាងទេវកី វៀរលែងក្រឹស្ណ បានគេប្ដូរខ្លួនជាមួយនាងនន្ទ ។ ក្រោយមកក្រឹស្ណបានវិលមកសម្លាប់ស្ដេចកម្សបានវិញ ។

ពួកគង្វាលគោមួយក្រុម ដែលគាំទ្រឡើងដោយក្រឹស្ណ ត្រូវព្រះឥន្ទ្រ ដែលជាបរិវារព្រះឥសូរ បានសាចកាំរន្ទះយ៉ាងច្រើន ពីលើអាកាសមក ។ ក្រឹស្ណបានលើកភ្នំគោវធនៈ ( Govardhana ) បាំងដូចឆ័ត្រ ដើម្បីការពារកាំរន្ទះ ។

( សូមអានរឿងមហាភារតៈ )

- ពុទ្ធ (Bouddha)

ពួកវិស្ណុនិយម ( Visnuiste ) បានបញ្ចូលតួអង្គព្រះពុទ្ធជាអវតារទី ៩ នៃព្រះវិស្ណុ ដែលមានមុខងារ

មកកំចាត់ការបូជាយញ្ញ បង្ហូរឈាមឥតប្រយោជន៍ ជាសំសត្វមនុស្ស ឲ្យព្រះបង់ចោលគម្ពីរវេទ រំលាយចោលនូវរបបរស់នៅជាវណ្ណៈ ( abolir le système des castes ) ប៉ុន្តែគម្ពីរជាតក បានចែងថាព្រះវិស្ណុក្តី អវតារព្រះវិស្ណុក្តី ជាពិសេសគឺក្រិស្ណ សុទ្ធសឹងជាមារគាមព្យាបាទ ( IC n ; 1050 page 511 ) ។

ការបញ្ចូលអង្គព្រះពុទ្ធជាអវតារ នៃព្រះវិស្ណុ ជាមធ្យោបាយប្រមូលផ្តុំពុទ្ធបរិស័ទ ឲ្យមានជំនឿមកកាន់សាសនាព្រះវិស្ណុវិញ ។

- កលកិន (Kalkin)

គឺជាអវតារទី ១០ នៃព្រះវិស្ណុ ដែលមានខ្លួនជាមនុស្ស ក្បាលជាសេះ ហើយមានមុខងារជាអ្នកកាត់សេចក្តីពួកសភាវៈអាក្រក់ ដោយការដាក់ទណ្ឌកម្ម និងឲ្យរង្វាន់ពួកសភាវៈល្អ ដើម្បីរៀបចំ យុគ

មាស ( l' âge d' or) ។

សង្កេត.–

មានគាថាមួយរបស់មនុ ( Manu ) បាន

ចែងថា ៖

– ព្រះសិវៈ ជាព្រះអាទិទេព នៃវណ្ណៈព្រាហ្មណ៍

– ព្រះវិស្ណុ ជាព្រះអាទិទេព នៃវណ្ណៈក្សត្រ

– ព្រះព្រហ្ម ជាព្រះអាទិទេព នៃវណ្ណៈវេស្ស

– ព្រះគណេស ជាព្រះអាទិទេព នៃវណ្ណៈ សូទ្រ

( IC n ; 994 page 483 )

ឃ/ អំពីព្រះហរិហរៈ ( Harihara )

មានគម្ពីរវេទខ្លះ បានចែងអំពីព្រះហរិហរៈ ដែលជា ព្រះអាទិទេព ផ្សំរវាង ព្រះវិស្ណុ និង ព្រះសិវៈ ( Dieux jumelés ) ។

– ចំហៀងឆ្វេង គឺព្រះហរិ ឬ ព្រះវិស្ណុ

– ចំហៀងស្តាំ គឺព្រះហរៈ ឬ ព្រះសិវៈ

គេបានរកឃើញកំណើតព្រះហរិហរៈ នៅប្រទេសឥណ្ឌា នាសតវត្សទី ១០ ។ ជំនឿព្រះហរិហរៈបានផ្សាយឥទ្ធិពលខ្លាំង នៅឥណ្ឌាប៉ែកខាងត្បូង នាសតវត្សទី ១៤ ប៉ុន្តែគេរកឃើញបដិមាព្រះហរិហរៈនៅប្រទេសខ្មែរ តាំងពីសតវត្សទី ៦ ម្ល៉េះ ( IC n; 1063 page 518 ) ។

ជំនឿព្រះហរិហរៈ ជាជំនឿ ដែលកើតឡើងនៅពេលដែលមានវិបត្តិរវាងសាសនាព្រះវិស្ណុ និងសាសនាព្រះសិវៈ ។ ដើម្បីដោះស្រាយ នូវការបែកបាក់គ្នា គេបានបង្រួបបង្រួមព្រះអាទិទេពទាំងពីរអង្គនេះ ជាព្រះអាទិទេពតែមួយអង្គ ។ អ្នកកាន់សាសនាព្រះវិស្ណុក្តី ព្រះសិវៈក្តី អាចគោរពបូជាព្រះហរិហរៈបានទាំងអស់ ។

# អំពីព្រះពុទ្ធសាសនា

មុននឹងសិក្សាគោលលទ្ធិសំខាន់ៗ ក្នុងព្រះពុទ្ធសាសនា យើងគួរស្គាល់តួអង្គព្រះពុទ្ធសិនៗ មានលក្ខណ ២ យ៉ាង សម្រាប់សម្គាល់ ៖

– ឆាកជីវិតព្រះពុទ្ធអង្គ (Scène de la vie du Buddha )

– កាយវិការព្រះពុទ្ធអង្គ (Geste du Buddha )

១- អំពីឆាកជីវិតព្រះពុទ្ធអង្គ

ទោះបីយើងពុំបានរស់នៅ ក្នុងសម័យពុទ្ធកាលយើងអាចស្គាល់ឆាកជីវិតព្រះពុទ្ធអង្គ ដោយសាររូបចម្លាក់ និងគំនូរផ្សេងៗ ដែលគេឆ្លាក់ ឬគូរផ្ទៃគណា ដែលសំខាន់ៗ ដូចជា ៖

– ព្រះពុទ្ធអង្គប្រសូត (La naissance du Buddha)

– ការជួបប្រទះនឹងហេតុទាំង៤ គឺមនុស្សចាស់ ឈឺ

ស្ដាប់ និង ព្រះសង្ឃ (Les 4 rencontres du Buddha)

– ការយាងចេញសាងព្រះផ្នួស (L' ermitage)

– ការធ្វើទុក្ករកិរិយា (Le Martyr)

– ការជួបប្រទះ និងពួកមារ ( Rencontre du Buddha et Mâra)

– ការសម្រេចព្រះសម្ពោធិញ្ញាណ ( Buddha illuminé )

– ការចូលបរិនិព្វាន ( Le Nirvâna )

២ - កាយវិការព្រះពុទ្ធអង្គ ឬ មុទ្រ

សព្វថ្ងៃនេះ គេបានស្រាវជ្រាវរកឃើញរូបចម្លាក់ ព្រះពុទ្ធអង្គ ច្រើនថែបយ៉ាង ប្រកបដោយកាយវិការ ប្លែកៗគ្នា ៖

- ឈានមុទ្រ ឬកាយវិការសមាធិ (Geste de la méditation)

- ភូមិស្បស៌មុទ្រ ឬកាយវិការយកព្រះធរណីជាសាក្សី (Geste d' attestation de la Terre )

- អភ័យមុទ្រ ឬកាយវិការអប់រំកុំឲ្យភ័យខ្លាចអ្វីៗ ដែលពុំទាន់

ពិហារណា (Geste d' absence de crainte)

- ធម្មចក្កមុទ្រ ឬកាយវិការ កំពុងធ្វើអត្ថាធិប្បាយដូចមានចែង នៅក្នុងគម្ពីរធម្មចក្កប្បវត្តនសូត្រ ( Geste du Buddha enseignant la doctrine )

- វរមុទ្រ ឬកាយវិការគេហ៍ ឲ្យមានចិត្តសប្បុរស ( Geste de charité )

- វិតក្កមុទ្រ ឬ កាយវិការ កំពុងពិចារណារកខុស ត្រូវ ( Geste d' argumentation )

សង្កេត – លក្ខណៈពិសេស នៃកាយវិការគួរកត់សម្គាល់ គឺទឹកព្រះភក្ត្រញញឹមជាដរាប ហាក់ដូចជាគេឃើញ នូវភាពកំបាំងមួយ ដ៏សែនជ្រៅ ( le sourire éternel du Buddha ou le visage idéalisé du Buddha )

---

## សង្ខេបពុទ្ធប្រវត្តិ —

សូមអានសង្ខេបពុទ្ធប្រវត្តិ ដែលរៀបរៀងតាមពុទ្ធសាសនបណ្ឌិត្យ និងសៀវភៅ « ជីវិតសទ្ធិភាព » របស់ព្រះធម្មបាលខៀវជុំ ។ សេចក្តីសង្ខេប ដូចខាងក្រោមនេះ មានប្រភពមកពីអត្ថបទ លោកកហុល ៖

- ព្រះពុទ្ធអង្គប្រសូត នៅក្រុងកបិលពស្តុ ក្នុងសួនលុម្ពិនី ទ្រង់មានព្រះនាម៣ ព្រះសិទ្ធត្ថ ក្នុងរាជវង្សគោតម ( Gotama ).
- ព្រះបិតា ព្រះនាមសុទ្ធោទនៈ ព្រះមាតា ព្រះនាមមាយា សោយពេញនៅឥណ្ឌា ខែកខាងជើងឈ្មោះវជ្ជសាក្យ ឬ នេប៉ាល សព្វថ្ងៃនេះ នាសតវត្សទី ៦ មុន គ.ស.
- បានរៀបអភិសេកជាមួយនាងពិម្ពាយសោធរាក្នុងព្រះជន្មាយុ ១៦ វស្សា ហើយបានរស់នៅក្នុង

និរោធធម៌ប្រសើរបំផុត

– ចក្ខុជីវិត បាន ធ្វើឲ្យទ្រង់យល់ដល់ការឈឺចាប់ របស់សត្វលោក

– ក្នុងព្រះជន្មាយុ ២៩ ឆ្នាំ ហើយក្រោយពេល បានព្រះរាជបុត្រមួយអង្គ ព្រះនាមរាហុលកុមារ ទើបព្រះសិទ្ធត្ថកុមារ បោះបង់ចោល រាជសម្បត្តិ ហើយបានយាងចេញទៅសាងផ្នួស ។

– ទ្រង់បានយាងទៅសិក្សា និងគ្រូជាច្រើនអង្គប៉ុន្តែ ពុំបានសម្រេច

– ក្នុងព្រះជន្មាយុ ៣៥ ឆ្នាំ នារាត្រីមួយ ទ្រង់បាន ទៅសិក្សាក្រោមដើមពោធិ នៅក្នុងពិហារសព្វ ថ្ងៃ ទ្រង់បានសម្រេច ព្រះសម្ពោធិញ្ញាណ ក្នុងការ ចេះដឹងសព្វគ្រប់ ។

– ព្រះអង្គ បានយាងទៅប្រកាសបញ្ញត្តិយ ឬកិច្ចដ៏ អង្គ ជាសហការីរបស់ទៅ ពសិបពទមិពទាយពន

ក្បែរក្រុងពារាណសី

– ទ្រង់យាងប្រកាសសច្ចធម៌ ដោយមិនប្រកាន់

វណ្ណៈ ព្រមទាំងប្រកាសផ្សាយការលាងវណ្ណ

ទៀតផង

– ទ្រង់ចូលបរិនិព្វាន ក្នុងព្រះជន្មាយុ ៨០ វស្សានៅ

ក្រុងកុសិនារា ដែលសព្វថ្ងៃ ហៅឧត្តរប្រទេស

( Uttar Pradesh)

[illegible] – សព្វថ្ងៃព្រះពុទ្ធសាសនាមាននៅ ៖

– សិរីលង្កា

– ភូមា

– សៀម

– ខ្មែរ

– លាវ

– យួន

– ទីប

- ចិន

- ជប៉ុន

- ម៉ុងគោលី

- កូរ៉េ

- ហ្វ័រម៉ូស

- ប៉ាគិស្ថាន

- នេប៉ាល

ប្រទេសឥណ្ឌាផ្នែកខ្លះ

រួមទាំងអស់មានពុទ្ធសាសនិកជន ប្រហែល ជាង ៥០០ លាននាក់ ( ស្ថិតិឆ្នាំ១៩៦១ )

---

# អំពីពុទ្ធលទ្ធិ

ក្នុងព្រះពុទ្ធសាសនា ទស្សនៈ ក ណាទ្វិតាំ ជុំគ្នារបស់ព្រះពុទ្ធអង្គបិតនៅក្នុង គម្ពីរ ព្រះ

ព្រះត្រៃបិដកជាអ្វី ?

( សូមអានទស្សនាវដ្ដីខេមរយានកម្ពុ ឆ្នាំ ៤ លេខ ៧ ទំព័រ ៨១-៨២-៨៣-៨៤-៨៥-៨៦ ៨៧ )

តទៅនេះជាអត្ថបទដកស្រង់ ៖

## ព្រះត្រៃបិដក

ក្នុងព្រះពុទ្ធសាសនាគម្ពីរព្រះត្រៃបិដក ជាឃ្លាំងផ្ទុកព្រះពុទ្ធវចនៈ គឺវចនៈនៃអង្គព្រះសម្ពុទ្ធ ( Pensée du Bouddha ) ដែលទ្រង់ទេសនាទូន្មានរហូត ៤៥ វស្សា ចាប់តាំងពីទ្រង់បានត្រាស់ដឹងព្រះសម្ពោធិញាណ រហូតមកដល់ទ្រង់បរិនិព្វាន ។ វចនៈដែលទ្រង់សម្ដែងនេះហៅថា ធម្មវិន័យ ដែលព្រះអង្គសម្ដែងបញ្ញត្ត ( ធម្មោ ច វិនយោ ច

ទេសិតោ បញ្ញត្តោ) ។ ធម្មវិន័យនេះមាន ៣ ចំណែក គឺ សុត្តន្ត វិន័យ អភិធម្ម ទាំង៣ចំណែកនេះព្រះថេរទាំងឡាយ បានសង្គាយនា (ផ្ទៀងផ្ទាត់) ចងក្រងហើយដាក់ទុកមួយក្រមៗ ហៅថា តិបិដក ឬព្រះត្រៃបិដក «កញ្ច្រែបី» (Triple Corbeille) ។ ពាក្យថា «បិដក» នេះ បើប្រែថា «ទូបណ្ណាល័យ» ក៏សឹងតែបានដែរ ។ បើប្រៀបធៀបមើលឃើញថា គម្ពីរព្រះត្រៃបិដកនេះ មានចំនួនច្រើនជាងគម្ពីរវេទៈច្រើនណាស់ ច្រើនជាង គម្ពីរប៊ីប ១១ដង ច្រើនជាង គម្ពីរគូរអាន ជាអនេក ។

គម្ពីរព្រះត្រៃបិដកនេះ បរិសុទ្ធគង់នៅដូចដើមគ្រប់ប្រការ មានលក្ខណៈជាគម្ពីរសាសនាពេញបរិបូណ៌ ព្រោះមិនមែនជាប្រវត្តិសាស្ត្រទេ មិនមែនជាលទ្ធិសាសនាព្រាហ្មណ៍សាសនា ។ ក្រោយពុទ្ធបរិនិព្វានកាល មានការធ្វើសង្គាយនាផ្ទៀងផ្ទាត់ក្តាប់ ធ្វើឲ្យបានត្រឹមត្រូវគង់វង្សបរិសុទ្ធនៅដូចដើមមិនមានការបន្ថែមបន្ថយ ឬធ្វើក្រោមជាលើ លើជា

ក្រោមទេ ហើយសមប្រើគ្រប់កាលទៀតផង ។

គម្ពីរព្រះត្រៃបិដកមាន ៣បំណែកគឺ វិន័យបិដក (១៣ភាគ) សុត្តន្តបិដក (៦៤ភាគ) និងអភិធម្មបិដក (៣៣ភាគ) គម្ពីរទាំង៣នេះមានអដ្ឋកថាដីកាយោជនាប្រកបទៀតផង ។

ក- វិន័យបិដក ជាគម្ពីរស្តីពីច្បាប់ក្រឹត្យក្រម(Discipline) ដែលអង្គព្រះសម្ពុទ្ធទ្រង់បញ្ញត្តទ្រង់អនុញ្ញាត ទុកសម្រាប់ជាផ្លូវប្រតិបត្តិរបស់ភិក្ខុ ភិក្ខុនី ឧបាសក ឧបាសិកា ។ គម្ពីរវិន័យនេះមានក្តីពិស្តារណាស់ ជាកញ្ចក់ឆ្លុះមើលជីវប្រវត្តិអង្គព្រះសម្ពុទ្ធ ក្នុងកាលដែលទ្រង់គង់ធរមាននៅឡើយព្រមទាំងហេតុការណ៍ផ្សេងៗ នៅប្រទេសឥណ្ឌាសម័យព្រះអង្គ ដូចប្រវត្តិសាស្ត្រ ទំនៀមទម្លាប់ ការបេនាទិងវេទ្យសាស្ត្រ ផ្សេងៗ ។ល។

វិន័យបិដកនេះមាន ៥ គម្ពីរ គឺ៖

១- អាទិកម្ម (ទោសធ្ងន់) } វិភង្គ
២- បាចិត្តិយ (ទោសស្រាល)

៣- មហាវគ្គ (វគ្គធំ) } ខន្ធក

៤- ចុល្លវគ្គ (វគ្គតូច) } ខន្ធក

៥- បរិវារ (បទកាយវេរ)

១- សុត្តន្តបិដក ជាគម្ពីរស្ដីពីសូត្រ (Aphorisme) ដែលអង្គព្រះសម្មាសម្ពុទ្ធទ្រង់ត្រាស់ទេសនា ក្នុងសម័យផ្សេងៗ មានសូត្រខ្លះព្រះអរិយសាវកសំដែងដូចព្រះសារីបុត្តថេរ ព្រះមោគ្គល្លានថេរអានន្ទថេរ ។ គម្ពីរសុត្តន្ត ឬ គម្ពីរព្រះសូត្រ មាន ៥ គម្ពីរគឺ ៖

១- ទីឃនិកាយ សូត្រមានសេចក្ដីពិស្ដារ

២- មជ្ឈិមនិកាយ សូត្រមានសេចក្ដីមធ្យម

៣- សំយុត្តនិកាយ សូត្រមានសេចក្ដីទៅហៅលើៗគ្នា

៤- អង្គុត្តរនិកាយ សូត្រមានសេចក្ដីជាក្រុមជាពួក

៥- ខុទ្ទកនិកាយ សូត្រមានសេចក្ដីខ្លីៗ

ជាពិសេស មាននិកាយតូចៗ គឺទៅទៀតចំនួន ១៥ និកាយគឺ ៖

១- ខុទ្ទកបាឋ  អត្ថបទខ្លី

២- ធម្មបទ  ផ្លូវនៃសច្ចធម៌

៣- ឧទាន  គាថាធ្វើឲ្យកើតក្ដីរីករាយ

៤- ឥតិវុត្តក  សូត្រដែលស្ដីថា « អានដូច្នេះ »

៦- វិមានវត្ថុ  និទានស្ដីពីវិមាននៅទេវបុរី

៧- បេតវត្ថុ  និទានស្ដីពីប្រេត

៨- ថេរគាថា  គាថាព្រះថេរទេសនា

៩- ថេរីគាថា  គាថាព្រះនាង ថេរីទេសនា

១០- ជាតក  និទានជាតក

១១- និទ្ទេស  ការសំដែងពន្យល់

១២- បដិសម្ភិទា  វិជ្ជាវិភាគ

១៣- អបទាន  ជីវភាពព្រះអរហន្ត

១៤- ពុទ្ធវង្ស  ប្រវត្តិវង្សព្រះពុទ្ធ

១៥- ចរិយាបិដក  វិធីប្រតិបត្តិតាមពុទ្ធចរិយា

គ- អភិធម្មបិដក  ជាគម្ពីរស្ដីពីធម៌មានភាពជ្រាលជ្រៅ

ល្អិតសុខុមបំផុត (Métaphysique) បានដល់ទស្សនវិជ្ជាព្រះសម្ពុទ្ធ ដែលមានការពិតម៉្កកោត ជាអត្ថបទផុសពីសុត្តន្តបិដក ដែលមានតែអត្ថបទមានការពិតកក់ៗ គឺសុត្តន្តបិដកជាវោហារទេសនា (Parole Conventionnelle) ឯអភិធម្មបិដកជាបរមត្ថទេសនា (Parole définitive) ស្តីពីចិត្ត (Conscience) ចេតសិក (Mental concomitant) រូប (Matière) និព្វាន ។ អភិធម្មបិដកនេះព្រះសម្ពុទ្ធ ទេសនាទុកថា សត្វទាំងអស់ជា « បុគ្គល » ដោយការវែកញែកយ៉ាងល្អិតសុខុម ទាល់តែបែកលែងកើត ហើយវែករំលែកធម៌ដោយបរិយាយហ្មត់ចត់បំផុត ។

គម្ពីរនេះមានទាំងអស់ ៧ គម្ពីរ គឺ ៖

១- ធម្មសង្គណី ការរាប់រៀបធម៌

២- វិភង្គ ការវែករំលែកធម៌

៣- កថាវត្ថុ ចំណុចធម៌ដែលមានសេចក្តីផ្ទុយគ្នា

៤- បុគ្គលបញ្ញត្តិ បញ្ញត្តិថា « បុគ្គល »

៥- ធាតុកថា ការបែកញែកធាតុ

៦- យមក : ធម៌គូៗគ្នា

៧- បដ្ឋាន ធម៌ជាបច្ច័យទាក់ទងគ្នា

បិដកទាំងបីនេះឈ្មោះថា តិបិដក ឬ ត្រៃបិដក ។ ប្រទេសកម្ពុជាយើងបោះពុម្ពជាសៀវភៅខ្នាតធំមានចំនួន ១១០ សៀវភៅ ជាចំនួនដែលលើសលុបគុណភាសា បើប្រៀបធៀបទៅភាសានានាក្នុងលោក ។

## អំពីសង្គាយនា

សង្គាយនាទីមួយ.- ដើម្បីឲ្យបរិសុទ្ធគង់នៅដូចដើម ក្រោយពុទ្ធបរិនិព្វានភ្លាម ព្រះមហាថេរទាំងឡាយចាត់ការធ្វើសង្គាយនាព្រះពុទ្ធវចនៈភ្លាម ដោយហេតុថាសុភទ្ទភិក្ខុធ្វើឲ្យខូចការរៀបរយក្នុងពុទ្ធសាសនា ។ ព្រះអរហន្តជាសង្គីតិកាចារ្យ ៥០០ អង្គ មានព្រះមហាកស្សបត្ថេរជាប្រធាន ហើយជាអ្នកសួរ ដើមឡើយសួរវិន័យព្រះឧបាលិត្ថេរជាអ្នកឆ្លើយ តមកសួរធម៌ព្រះអានន្ទត្ថេរឆ្លើយ សុត្តន្ត

និង អភិធម្ម ។ កាលនោះមិនទាន់មានចារឹកជាលាយ លក្ខណ៍អក្សរទេ ស្វាធ្យាយ យល់ឃើញជាត្រឹមត្រូវហើយ ព្រះអរហន្តទាំង ៥០០ អង្គស្វាធ្យាយ គឺសូត្រព្រមគ្នាគ្រប់ ទាំង ៥០០ អង្គ ចងចាំតែមាត់ស្ទាត់ ។ ការចងចាំតែមាត់ ទះទេះបែបនេះ លោកហៅថា មុខបាឋ ។ ធ្វើដូច្នេះហៅថា សង្គាយនា ។ សង្គាយនានេះធ្វើអស់រយៈវេលា ៧ ខែ ទើប ចប់ស្រេច ។

សង្គាយនានេះឈ្មោះបឋមសង្គាយនា ធ្វើក្រោយពុទ្ធ បរិនិព្វានប្រមាណ ៣ ខែ គឺពុទ្ធសករាជកន្លងទៅបានប្រ-មាណ ៣ ខែ មុនគ្រិស្តសករាជ ៤៧៦ ឆ្នាំ ធ្វើនៅក្នុងក្រុង រាជគ្រឹះ លើភ្នំវេភារៈ ត្រង់កន្លែងមួយស្គាល់ឈ្មោះសត្តបណ្ណ គុហា ក្រោមការឧបត្ថម្ភព្រះបាទអជាតសត្រូវ ដែនមគធៈ សព្វថ្ងៃហៅ រដ្ឋពិហារ ប្រទេសឥណ្ឌា ។

សង្គាយនាទីពីរ.- កាលវេលាកន្លងទៅបាន ១០០ ឆ្នាំ មានការកើតប្រព្រឹត្តកន្លងពុទ្ធបញ្ញត្តិ ជាហេតុនាំ

ឲ្យសៅហ្មងមណ្ឌលសង្ឃក្នុងពុទ្ធសាសនា ។ ពួកវជ្ជីបុត្ត
គឺភិក្ខុជាបព្វជិតក្នុងនៅអ្នកដែនវជ្ជី ប្រព្រឹត្តកន្លងសិក្ខាបទ ១០
ប្រការ លោកហៅថាវត្ថុ ១០ ប្រការ នេះជាដើមហេតុនាំ
ឲ្យកើតការសង្គាយនាលើកទីពីរឡើង ។ ព្រះយសត្ថេរ
(កាកណ្ឌបុត្ត) ប្រកាសការប្រព្រឹត្តិកន្លងវិន័យនេះឲ្យព្រះ
សង្ឃជ្រាបទូទៅ ។

សង្គាយនានេះធ្វើឡើងនៅក្រោមអធិបតីភាពព្រះសព្វ
កាមិត្ថេរ ព្រះរេវតត្ថេរ សហជាតិជាអ្នកសួរ ព្រះសព្វកាមិ
ត្ថេរ ជាអ្នកឆ្លើយ ព្រះសង្គីតិកាចារ្យជាព្រះអរហន្ត សុទ្ធ
សឹងជាតិបិដកធរចំនួន ៧០០ អង្គ ធ្វើនៅវត្តវាលុការាម ក្រុង
វេសាលីដែនវជ្ជី ក្រោមព្រះរាជូបត្ថម្ភ ព្រះបាទកាលាសោក
ជាព្រះរាជានៅក្រុងបាដលិបុត្ត (បត្ន) ប្រទេសឥណ្ឌា ពុទ្ធ
សករាជកន្លងទៅបានចំនួន ១០០ ឆ្នាំ មុនគ្រិស្តសករាជ
៣៧៧ ឆ្នាំ ។ ព្រះសង្ឃនៅចងចាំព្រះពុទ្ធវចនៈ ដោយ
មុខបាឋដដែល ។ តាមប្រពៃណីតមកនិយាយថា សង្គាយ

ឆានេះឈ្មោះទុតិយសង្គាយនា ធ្វើអស់ចិរវេលា ៨ ខែទើប ចប់ស្រេច ។

សង្គាយនាទីបី .- កាលវេលាកន្លងទៅបាន ប្រមាណ ២១៨ ឆ្នាំ ក្រោយពុទ្ធបរិនិព្វានមានព្រះមហាក្សត្រ មួយព្រះ[illegible] ។ កាលនោះមានការ ប្រឡូកប្រឡល់ឡើងក្នុងធម្មវិន័យព្រះពុទ្ធសាសនា ។ មានអត្ថ-បទខ្លះនិយាយថា ពួកអ្នកកាន់លទ្ធិព្រាហ្មណ៍ចូលមកបួស បន្ទំជាភិក្ខុក្នុងមណ្ឌលពុទ្ធសាសនា ដោយអាស្រ័យការបរិ-បូណ៌លាភសក្ការៈ ដែលកើតមានឡើងក្នុងរជ្ជកាលព្រះបាទ ធម្មាសោកមហារាជ ហើយពោលពាក្យអធម្មកទិចបំរូងចំពាស់ ធ្វើក្តីបរិសុទ្ធធម្មវិន័យឲ្យកើតទៅជាសទ្ធម្មប្បដិរូប (Mélanges) សេចក្តីខាងលើនេះ មានសេចក្តីពិតច្រើនណាស់ ព្រោះ ជាហេតុការណ៍នេះ ជាបុព្វហេតុនាំឲ្យលទ្ធិសាសនា ព្រាហ្មណ៍ក្លាយទៅជាលទ្ធិសាសនាហិណ្ឌូមួយគ្រឡប់ទៀត ព្រមទាំងជាបុព្វហេតុឲ្យពុទ្ធសាសនា ចែកចេញជានិកាយ

ហើយសាបសូន្យពេញពីផែនដីវណ្ណា ។ ក្នុងកាលនោះឯង ពុទ្ធសាសនាបែកចេញទៅជាថេរវាទ ឬវិភជ្ជវាទ និងអាចរិយវាទ ឬមហាសង្ឃិកវាទ កើតក្រុមពុទ្ធសាសនាលទ្ធិមហាយាន មាននិកាយរាប់មិនអស់ ។

សង្គាយនាគ្រានេះហៅ តតិយសង្គាយនា ទុកជាមហាសង្គាយនាដ៏ល្អណាស់ ព្រោះជាសង្គាយនាដើម្បីកេក្តីបរិសុទ្ធធម្មវិន័យឲ្យគង់នៅតាមដើម ព្រះមហាមោគ្គលិបុត្តតិស្ស ដែលព្រោសព្រះបាទធម្មាសោកមហារាជ ឲ្យចូលសាសន៍ពុទ្ធរ័តន៍ ជាអធិបតីក្នុងការសង្គាយនា មានព្រះអរហន្តជា សង្គីតិកាចារ្យចំនួន ១០០០ អង្គ ចូលប្រជុំ នៅក្នុងអសោការាម ក្រុងបាដលិបុត្រដែនមគធៈ ធ្វើអស់រយៈវេលា ៩ ខែ ទើបបិទស្រេចក្រោមព្រះរាជូបត្ថម្ភព្រះបាទធម្មាសោកមហារាជ ។ សង្គាយនានេះ ក្នុងកាលប្រវត្តិខ្លះមិនឃើញប្រាប់កាលបរិច្ឆេទទេ ប្រាប់តែកាលបរិច្ឆេទ ព្រះបាទធម្មាសោកឡើងសោយរាជ្យ ព្រះសង្ឃនៅចង់ចាំព្រះពុទ្ធវចនៈ

ដោយមុខបាបផងដែលទៀត ។ ក្នុងសង្គាយនាទីបីនេះ ទើបមានការបញ្ជូនសមណទូត ទៅប្រកាសពុទ្ធសាសនាឲ្យផុតពេញពីព្រំប្រទល់ប្រទេសឥណ្ឌា ។

នៅជម្ពូទ្វីប ប្រទេសឥណ្ឌា មានសង្គាយនាទីបួនមួយទៀត ធ្វើនៅដែនកស្មីរ ក្រោមព្រះរាជូបត្ថម្ភនៃព្រះបាទកនិស្កៈ ។

សង្គាយនាដំបូង.– សង្គាយនាទីបីធ្វើស្រេចហើយ សង្ឃសុំនិមន្តព្រះមហិន្ទត្ថេរជាព្រះរាជបុត្រព្រះបាទធម្មាសោកមហារាជ ជាសមណទូតទៅប្រកាសពុទ្ធសាសនានៅលង្កាទ្វីប ។ និមន្តទៅដល់ ព្រះមហិន្ទត្ថេរបានប្រោសព្រះបាទទេវានម្បិយតិស្ស ជាព្រះមហាក្សត្រកោះលង្កាព្រមទាំងប្រជាជននៅកោះ ឲ្យចូលកាន់សាសនព្ពុទ្ធ-តន៍ ។

ដើម្បីប្រតិស្ឋានពុទ្ធសាសនា ព្រះបាទទេវានម្បិយ-តិស្សក្រោបបង្គំទូលព្រះមហិន្ទត្ថេរ សូមធ្វើសង្គាយនាជម

វិន័យ ។ សង្គាយនានេះមិនមានហេតុជាក្តីសៅហ្មងកើតឡើងក្នុងពុទ្ធសាសនាទេ ធ្វើដើម្បីប្រតិស្ឋានពុទ្ធសាសនានៅកោះលង្កា ។ មុនធ្វើការសង្គាយនា ព្រះបាទទេវានម្បិយ-តិស្ស បញ្ជូនទូតឲ្យចូលទៅក្រាបបង្គំគាល់ ព្រះបាទធម្មា-សោកមហារាជនៅជម្ពូទ្វីប (ប្រទេសឥណ្ឌា) សូមនិមន្តព្រះនាងសង្ឃមិត្តាថេរី ជាព្រះរាជបុត្រីព្រះអង្គ ព្រមទាំងសាខាព្រះមហាពោធិព្រឹក្សទៅកាន់កោះលង្កាផង ត្បិតព្រះនាងអនុឡាទេវីជាព្រះអនុជថ្លៃ សព្វព្រះទ័យបព្វជាជាភិក្ខុនី។ កាលបើព្រះនាងសង្ឃមិត្តាថេរីនិមន្តដល់កោះលង្កាព្រមទាំងព្រះមហាពោធិព្រឹក្សហើយ សង្គាយនានេះចាប់ផ្តើមធ្វើឡើង ។

កាលនោះ ព្រះសង្ឃលង្កាបានសិក្សាព្រះពុទ្ធវចនៈ ចេះចាំស្ទាត់ច្រើនអង្គ បានរួមចូលធ្វើជាសង្គីតិកាចារ្យនៅវត្តថូបារាម ក្នុងក្រុងអនុរាធបុរៈ ធ្វើអស់រយៈវេលាចំនួន ១០ ខែ ទើបចប់ស្រេចក្នុងពុទ្ធសករាជ ២៣៦ (មុនគ្រិស្តសករាជ

៤៤១ ឆ្នាំ ) ។ សង្គាយនានេះទុកជាចតុត្ថសង្គាយនា ។ សង្គាយនាទាំងបួនលើកនេះ គឺ ១-៤ នៅប្រទេសឥណ្ឌាមិនមានកាលប្រវត្តិច្បាស់លាស់ មានតែនៅក្នុងកាលប្បវត្តិការលង្កា គឺគម្ពីរមហាវង្សនិងទីបវង្ស ។

សង្គាយនាជាទីប្រាំ , ក្នុងកាលប្បវត្តិនៃកោះលង្កា មានសេចក្តីថា ព្រះបាទវដ្តគាមិនីអភ័យ ព្រះមហាក្សត្រកោះលង្កាទ្រង់កសាងវត្តមួយ នៅក្នុងក្រុងអនុរាធបុរៈ ហើយឲ្យឈ្មោះថា «អភយគិរីវិហារ» ប្រគេនមហាថេរព្រះនាមតិស្ស[១] ។ ព្រះមហាថេរអង្គនេះកាន់តាមលទ្ធិវជ្ជីបុត្តភិក្ខុផ្សាយពីធម៌វិន័យ ជាហេតុនាំឲ្យមានទំនាស់ដល់ព្រះសង្ឃ

---

១. ព្រះមហាថេរតិស្សអង្គនេះ មាននាមបញ្ញត្តិមួយទៀតថា ធម្មរុចិយៈ ជាអ្នកតែងគម្ពីរមួយឈ្មោះថា វិមុត្តិមគ្គ ជាគម្ពីរប្រណាំងនឹងគម្ពីរ វិសុទ្ធិមគ្គ ជាស្នាដៃព្រះពុទ្ធឃោសាចារ្យ ព្រឹត្តិការណ៍បែបនេះកើតមាននៅឧបទ្វីបអាស៊ីអាគ្នេយ៍នេះដែរ គឺគម្ពីរសារត្ថសង្គហៈ ជាស្នាដៃព្រះនន្ទាចារ្យ ប្រណាំងនឹងគម្ពីរទីបនីអដ្ឋកថាមង្គលសូត្រ ជាស្នាដៃព្រះសុមង្គលាចារ្យ ។

នៅវត្តមហាវិហារ ។ គឺការមិនចុះសម្រុងគ្នានេះហើយ ដែលជាហេតុនាំឲ្យកើតសង្គាយនាទីប្រាំនេះឡើង ។ ជាការសង្គាយនាសំខាន់នាំឲ្យចារឹកព្រះពុទ្ធវចនៈឡើងកាន់ស្លឹករឹត ជាលាយលក្ខណ៍អក្សរមុនដំបូងបង្អស់ ក្នុងប្រវត្តិពុទ្ធសាសនា ។

សង្គាយនានេះទុកជាបញ្ចមសង្គាយនា សង្គាយនាចារឹកពុទ្ធវចនៈជាលាយលក្ខណ៍អក្សរ នៅវត្តមហាវិហារ ព្រះពុទ្ធត្ថេរជាប្រធាន ជាអ្នកសួរ ព្រះតិស្សត្ថេរជាអ្នកឆ្លើយ ក្រោមព្រះរាជូបត្ថម្ភព្រះបាទវដ្តគាមិនីអភ័យ ព្រះមហាក្សត្រកោះលង្កា ធ្វើអស់ចិរវេលាមួយឆ្នាំចប់ស្រេចក្នុងពុទ្ធសករាជ ៤២០ (មុនគ្រិស្តសករាជ ២៤ ឆ្នាំ) ។

ចំណេរកាលតមក មានការសង្គាយនាក្រោយៗបន្តមកទៀតនៅកោះលង្កា នៅប្រទេសភូមា នៅប្រទេសសៀមៗ

**ពុទ្ធលទ្ធិមានគោលសំខាន់ៗ ដូចតទៅ ៖**

**គោលទី១...**

# ពុទ្ធលទ្ធិឆ្ពោះទៅរកសុខៈ

- ដឹកនាំមនុស្សឲ្យខំសាងអំពើល្អ ចៀសវាងអំពើអាក្រក់
- លើកយកទស្សនៈ វិបាកនិយម ( le Déterminisme ) មក

បង្ហាញភ្ជាប់ហេតុ និងផល ( loi de la causalité )

- លើកយកបញ្ហាកម្មផលមកបង្ហាញ ( la fatalité )

ដែលមនុស្សត្រូវទទួលដោយចៀសពុំរួច

បើជឿថាមានកម្មផល គឺជឿថាមនុស្សស្លាប់ [illegible]តវិញ

- លើកយកទ្រឹស្តី ទុក្ខ បង្ហាញឲ្យមនុស្សចៀសវាងជួប

មានចែងក្នុងគម្ពីរ ចតុរារិយសច្ចៈ (les 4 nobles vérités) ៖

- ទុក្ខ Dukkha
- សមុទយ Sámudaya
- និរោធ Nirodha
- មគ្គ Magga

១- ទុក្ខ : គឺៗ ដែលនាំឲ្យខ្លួនយើង ឬអ្នកដទៃជួបប្រទះ

ការពិបាកតាមផ្លូវកាយ វាចា ចិត្ត និងសង្ខារៈ ។

ទុក្ខមានប្រចាំរូបកាយមនុស្សជាការពិតណាស់ ។

២- សមុទយ ឬហេតុនៃទុក្ខមកពី ៖

តណ្ហា
- ទោសៈ (កំហឹង)
- មោហៈ (ការវង្វេងដោយចេតនា)
- លោភៈ (ការចង់បានហួសហេតុ)
- រាគៈ (កាម)

តណ្ហាមានប្រភពមកពី បញ្ចក្ខន្ធ ឬ ខន្ធ៥ (les cinq agrégats) ៖

ខន្ធទី១ : រូប (la Matière)

រូបមានដើមកំណើតមកពីមហាភូតទាំង ៤ ៖

មហាភូត
- ដី (solidité)
- ទឹក (fluidité)
- ភ្លើង (chaleur)
- ខ្យល់ (mouvement)

ខន្ធទី២ - វេទនា (les sensations)

វេទនា { ចិត្តរំភើប ( émotion ) / - ចិត្តរំជួល ( sentiment ) / ចិត្តជំនក់ ( passion ) }

វេទនា មានកំណើតមកពី ផស្សៈ ( contact ) រវាងឥន្ទ្រិយ ( les sens ) និងលោកខាងក្រៅ ( le monde extérieur ) ។ ទំនាក់ទំនងរវាងឥន្ទ្រិយ និងលោកខាងក្រៅ មានឈ្មោះថាឥន្ទ្រិយារម្មណ៍ ៖

ឥន្ទ្រិយារម្មណ៍ {
- ភ្នែក → រូបារម្មណ៍
- ច្រមុះ → គន្ធារម្មណ៍
- អណ្តាត → រសារម្មណ៍
- ត្រចៀក → សទ្ទារម្មណ៍
- កាយ → កាយារម្មណ៍
- ចិត្ត → ចិន្តារម្មណ៍ ឬ មនោរម្មណ៍
}

ខន្ធទី ៣ ៖ សញ្ញា ( les perceptions )

សញ្ញាកើតឡើងដោយការស្គាល់ យល់ឃើញ ដឹង ឮ. ឬ ការទទួលនូវអារម្មណ៍ពីលោកខាងក្រៅតាមរយៈនៃឥន្ទ្រិយទាំង ៦ ។

ខន្ធទី ៤.- សង្ខារ ( les formations mentales )

សង្ខារ គឺអំពើល្អក្តី អាក្រក់ក្តីដែលយើងបានកសាង ។ សង្ខារមានប្រភពមកពីកម្ម ( Kamma ) ។ កម្មកើតមកអំពី ៖

- ចេតនា ( volition )
- ឆន្ទៈ ( volonté )
- មនសិការ ( attention )
- អធិមោក្ខ ( détermination )
- សទ្ធា ( confiance )
- សមាធិ ( concentration )
- បញ្ញា ( sagesse )
- រាគៈ ( désir )
- អវិជ្ជា ( ignorance )

– មានះ ( vanité )

– សក្កាយទិដ្ឋិ ( idée de la soi )

ខន្ធទី ៥ .– វិញ្ញាណ ( la conscience )

វិញ្ញាណជាសមត្ថភាពដែលធ្វើឲ្យយើងស្គាល់យល់លោកខាងក្រៅ និងខ្លួនយើង ។

៣/ និរោធ ឬ ការរំលត់ទុក្ខ

គឺការផប់បំបាត់ចោលនូវៈទោសៈ មោហៈ លោភៈ ពតៈ ដែលជាបំណងក្នុងវដ្តសង្សារ ។

៤/ មគ្គ ឬ ផ្លូវទៅកាន់ការរំលត់ទុក្ខ មានអង្គ ៨ៈ

– សម្មាទិដ្ឋិ : យល់ឃើញក្នុងផ្លូវត្រូវ

– សម្មាសង្កប្បៈ : ពិចារណាក្នុងផ្លូវត្រូវ

– សម្មាវាចា : និយាយក្នុងផ្លូវត្រូវ

– សម្មាកម្មន្តៈ : ធ្វើការក្នុងផ្លូវត្រូវ

– សម្មាអាជីវៈ : រកស៊ីក្នុងផ្លូវត្រូវ

– សម្មាវាយាមៈ : ព្យាយាមក្នុងផ្លូវត្រូវ

- សម្មាសតិ : ភ្ញាក់រលឹកក្នុងផ្លូវត្រូវ
- សម្មាសមាធិ : តម្កល់ចិត្តក្នុងផ្លូវត្រូវ

កាលណាគេបានសម្រេចមគ្គហើយ គេអាចធ្វើដំណើរឆ្ពោះទៅកាន់និព្វានដែលគេយល់ថាជាបរមសុខ ។ តែបើពុំបានសម្រេចនិព្វានក្តី ការធ្វើដំណើរតាមក្រោយផ្លូវនៃនិព្វានក៏បានសុខដែរ ។

និព្វានមាន ២ យ៉ាង ៖

- សឧបាទិសេសនិព្វាន ឬ និព្វានរស់
- អនុបាទិសេសនិព្វាន ឬ និព្វានស្លាប់

តើទ្រឹស្តីព្រះពុទ្ធអង្គ អាចឱ្យមនុស្សរកបានសុខឃើញទេ បើមនុស្សសព្វថ្ងៃពុំចង់ទៅនិព្វានផងនោះ ?

ការអប់រំដឹកនាំមនុស្ស ឱ្យទៅនិព្វានហាក់ដូចជាចុះចាញ់សង្គមមនុស្ស មានសេចក្តីថា បើសង្គមមនុស្សមានបញ្ហាកើតឡើង ត្រូវបបួលគ្នាតែទៅនិព្វាន ដោយការទុក-សាន៍តាមក្រោយផ្លូវនៃនិព្វាន កុំនៅក្នុងសង្គមមនុស្ស ។

អាស្រ័យហេតុនេះហើយ បានជាក្រោយមកមានការ កកើតលទ្ធិមហាយាន និងទស្សនៈផ្សេងៗទៀតយ៉ាងច្រើន ប្រឆាំងនឹងទ្រឹស្តីនិព្វាន ។

គោលទី ២

## ពុទ្ធលទ្ធិអំពីអនត្តៈ

## LA DOCTRINE DU NON-SOI

អនត្ត < អ + អត្ត

អត្ត ជាអ្វី ?

អត្ត គឺ ខ្លួន អញ ឬ ព្រលឹង ដែលភាសាសំស្ក្រឹត ហៅថា អាត្មន ( Ātman ) ឬសភាពខ្លឹមសារមិនប្រែប្រួល នៅក្នុងខ្លួនមនុស្ស សភាពឋិតថេរជានិច្ច សភាពជាសារជាតិពុំផ្លាស់ប្តូរ នៅខាងក្រោយលោក ប្រកបដោយធាតុគួរប្រែប្រួល ( C'est ce qu'il existe dans l'homme une entité permanente, éternelle et absolue qui est une substance immuable derrière le monde phénoménal changeant.)

សាសនាហិណ្ឌូបានថ្លែងថា អត្ត ឬ អាត្មនជាការ

បង្កើតរបស់អាទិទេព ។ កាលណាបុគ្គលស្លាប់ទៅ អាត្មន បាននាកចេញពីរាងកាយរបស់បុគ្គល រួចទៅជួបអាទិទេព ដែលជាអ្នកបង្កើតខ្លួន គឺ ព្រហ្មន ( Brahman ) ។ ការរួម បានសួគ៌ ឬ ការចុះនរក អាស្រ័យទៅលើ ព្រហ្មន ដូចជាអំពើ ល្អក្តី អាក្រក់ក្តី ឬ កម្ម ( Kamma ) ដែលអាត្មនធ្វើ ក៏ត្រូវស្របតាមបំណងអាទិទេពដែរ ។ ទស្សនៈបែបនេះ មានឈ្មោះ សក្កាយទិដ្ឋិ ( Idée de soi ) ។

ព្រះពុទ្ធសាសនាពុំទទួលថាមានអាត្មនដែលជាសភា-វៈខ្ជាប់ ហើយមានតម្លៃពិតប្រាកដនោះទេ ។ នេះជាមធ្យោបាយ របស់សាសនាខ្លះ ដើម្បីទាក់ទាញមនុស្សឲ្យជឿថាមានអា-ទិទេព ព្រោះអាទិទេពជាអ្នកបង្កើតអាត្មនមក ។ ជំនឿ មានអាត្មនជាបុព្វហេតុនៃសេចក្តីលោភ ការគិតប្រ-យោជន៍ផ្ទាល់ខ្លួន សេចក្តីត្រេកអរពុំចេះចប់ ការគណិតអាស្ងប់ ការគុំគួន ការធ្វេសប្រហែស អំណួត ទិដ្ឋិអំពើពុក រលួយដទៃទៀតយ៉ាងច្រើនរាប់មិនអស់ ដែលជាប្រភពធ្វើឲ្យ

ពិភពលោកមានកង្វល់រាំងពីរ ទាស់ផ្ទាល់ខ្លួន រហូតដល់ទំ-
នាស់រវាងជាតិសាសន៍ៗ នេះហើយជាដើមហេតុនៃសង្គ្រាម
ពិភពលោក បើគេដេញរោលឲ្យវែងឆ្ងាយទៅទៀត ។

ដើម្បីការពារអាត្នរបស់ខ្លួន មនុស្សត្រូវបង្កើតអា-
មកជាមធ្យោបាយបង្ក្រាបជនក្រីក្រ ជនត្រូវគេសង្កត់
សង្កិនកុំឲ្យបះបោរឡើង ។ អាត្នរបស់អ្នកក្រីក្រនៅជាអា-
ត្នរបស់អ្នកក្រីក្រដដែល រីឯអាត្នរបស់អ្នកមាននៅជាអា
ត្នរបស់អ្នកមានដដែល ។

ព្រះពុទ្ធអង្គពុំព្រមទទួលថា មានអាត្នទេ ដោយហេតុការៈ
រៈធ្វើជាកម្មវិតនៃពិចារណា ។ ធម្មជាតិទាំងឡាយគង់ការៈ
តែងតែប្រែប្រួល ។ ដូច្នេះអ្វីៗ ទាំងអស់ក្នុងធម្មជាតិត្រូវតែ
ប្រែប្រួលដែរ ។ នេះជាធម្មភាពភ្ជាប់ហេតុទៅនឹងផល
( Loi de la causalité) ។ ព្រះពុទ្ធអង្គយល់ថា នេះជាទ្រឹស្តី
ជ្រៅណាស់ ជនអវិជ្ជាពុំអាចក្រេបយកការពិតបានទេ ។
ព្រះអង្គបានធៀបប្រៀបមនុស្សលោកទៅ នឹងផ្កាឈូកនៅ

ពុទ្ធលទ្ធិអំពីអនត្ត មានអធិប្បាយយ៉ាងវែងក្នុងទ្រឹស្តីបដិច្ចសមុប្បាទ (la Production conditionnée) ។

បដិច្ចសមុប្បាទ ជាអ្វី ?

គឺជាទ្រឹស្តីស្វែងរកការពិត ដោយការពិចារណាភ្ជាប់ហេតុទៅនឹងផល

១ — បើនេះមាន នោះក៏ត្រូវមានដែរ

បើនេះគ្មាន នោះក៏គ្មានដែរ

បើនេះស្លាប់ នោះក៏ត្រូវស្លាប់

តាមទ្រឹស្តីនេះ កំណើតការៈក្នុងលោកៈ ត្រូវមានលក្ខណៈ ទំនាក់ទំនង និង ការប្រែស្រ័យគ្នាទៅវិញទៅមក ដូចជាខ្សែដ៏មួយ ពុំមែនដូចជាប្រាក់ទេ ។ ពុំមាននរណាម្នាក់ ជាអ្នកបង្កើតតែម្នាក់ឯង ឬជាហេតុដ៏ដាច់គេបង្កើតផលនោះឡើយ (Aucune cause première n' est acceptée par le Buddhisme.)

ទ្រឹស្តីបដិច្ចសមុប្បាទ មានចែងជាកត្តា ១២ យ៉ាង :

១ - អវិជ្ជា ធ្វើឲ្យកើតមានកម្ម (formations Karmiques)

២ - កម្ម ធ្វើឲ្យកើតមានវិញ្ញាណ (conscience)

៣ - វិញ្ញាណ ធ្វើឲ្យកើតមានធាតុភូតនាមរូប

(phénomènes mentaux et physiques)

៤ - ធាតុភូតនាមរូប ធ្វើឲ្យកើតមាន ឥន្ទ្រិយារម្មណ៍

ទាំង ៦ (les 6 facultés des sens)

៥ - ឥន្ទ្រិយារម្មណ៍ទាំង៦ ធ្វើឲ្យកើតមានផស្សៈ

(contact sensoriel et mental)

៦ - ផស្សៈ ធ្វើឲ្យកើតមានវេទនា ( sensation )

៧ - វេទនា ធ្វើឲ្យកើតមានចំណង់ ( désir )

៨ - ចំណង់ ធ្វើឲ្យកើតមានឧបាទាន ( la saisie )

៩ - ឧបាទាន ធ្វើឲ្យកើតមានភព

( le processus du devenir )

១០ - ភព ធ្វើឲ្យកើតមានជាតិ ( naissance )

១១ ជាតិ ធ្វើឲ្យកើតមានជរាមរណៈ ( ១២ )

( la décrépitude et la mort )

តាមទ្រឹស្ដីនេះ ជីវិតរបស់សត្វលោកត្រូវតែកើតមានឡើង ហើយវិលវល់ចុះឡើង ៗ ក្នុងវដ្តសង្សារ ដែលមាន អវិជ្ជា ជាប្រធាន ។

( សូមរង់ចាំអានភាគទី ២ ដែលមានការពន្យល់បន្តទៅទៀតយ៉ាងពិស្តារ )

១កញ្ញា ឆ្នាំ ១៩៧០

អ្នកនិពន្ធ


វប្បធម៌ និង អរិយធម៌ខ្មែរ

ភាគទី ១

បោះពុម្ពចំនួន ២០០០ ច្បាប់

តម្កល់ទុកតាមលេខ ៩៧៨

ចុះថ្ងៃទី ២៨ ខែ កញ្ញា ១៩៧០

